សារព័ត៌មាន ខ្មែរប៉ុស្ត៍ ស.រ.អា
KhmerPost USA
Advertising: PA/NJ/NY: (267) 253-3947/ CT: (860) 461-3687
MA/RI: (978) 656-8141/ (781) 244-0522

**មាតិការឿង** Vol 06 Issue 123 Feb. 8th-21th. 2013 **ទំព័រ**



32 Wamesit St., Lowell, MA 01852. Phone-Fax (978) 656 8141 www.khmerpost.us

# អត្ថន័យមេរុ និងជំនឿថ្វាយព្រះភ្លើងដើម្បី ព្រះវិញ្ញាណក្ខន្ធឡើងឋានសួគ៌



សូមអានទំព័រទី ១៣

## រឿងរ៉ាវ និងដើមកំណើត ចូលឆ្នាំចិន

•••ពិធីបុណ្យចូលឆ្នាំថ្មីរបស់ចិន គឺជាពិធីមួយដែលមានពីយូរលង់មកហើយ ហើយក៏ជាពិធីបុណ្យប្រពៃណីមួយដែលធំជាងគេក្នុងចំណោមពិធីបុណ្យប្រពៃណីនានារបស់ប្រជាជនចិន ។ ពិធីបុណ្យចូលឆ្នាំថ្មីនេះគេក៏អាចហៅបានម្យ៉ាងទៀតថា **តទៅទំព័រទី ១០**

## មន្ទីរសុខភាពសហគមន៍ឡូវែលបើកសម្ពោធ

**ខ្មែរប៉ុស្ត៍ ស.រ.អា**

មន្ទីរពេទ្យដ៏ឆ្នើមស្តីមស្តៃ និងទំនើបមួយទើបនឹងបើកទ្វារបំរើសុខភាពសហគមន៍នៅឡូវែលតំបន់ដែលមានខ្មែរច្រើនជាងគេរស់នៅនាឆ្នេរខាងកើតនៃសហរដ្ឋអាមេរិកនេះ កាលពីថ្ងៃទី១ កុម្ភៈ ២០១៣ កន្លងទៅនេះ ។

គឺជា"មណ្ឌលសុខភាពសហគមន៍ឡូវែល" ដែលបានចាប់កំណើតពីការខិតខំប្រឹងប្រែងរបស់សហគមន៍ទាំងមូល ។ ដើមឡើយជាមជ្ឈមណ្ឌលនៅបែកគ្នារាយច្រើនកន្លែង ។ ដើម្បីប្រមូលផ្តុំគ្នាឱ្យមករស់នៅជុំតែមួយកន្លែង គឺនៅ១៣៥ ផ្លូវ Jackson នេះ គឺមណ្ឌលសុខភាពសហគមន៍ត្រូវជួលអគារធំមួយជាអតីតអគារសមាគមខ្មែរជាសំណង់ឆ្នាំ១៨០០ សង់សម្រាប់រោងចក្រក្រណាត់ ដូច្នេះត្រូវជួសជុលកែច្នៃឱ្យទៅជាមន្ទីរព្យាបាលមានចំណុះ៧០បន្ទប់ក្នុងតម្លៃ៧០លាន ។

អ្នកស្រី គ្រីត សាយតូ ប្រធានមជ្ឈមណ្ឌលសុខភាពសហគមន៍និយាយថា ចំនួន៤២លានលុយបានមកពី "ស្ទីមី លីស"កម្មវិធីជំនួយរដ្ឋាភិបាលអូបាម៉ា៩លានកន្លះ **តទៅទំព័រទី ១៤**

រូបថត Jennifer Myers

I DO TAXES
ខ្ញុំទទួលធ្វើតាក់ជូនលោកអ្នក
ហើយទទួលប្រាក់បានឆាប់
ការិយាល័យមេធាវី ថូម៉ាស ស្តាលីយ៉ាណូស
Law Office of Thomas Stylianos
287 Appleton Street Lowell MA 01852
(978) 459-5000

ការិយាល័យ មេធាវី
ថូម៉ាស ស្តាលីយ៉ាណូស
Law Office of Thomas Stylianos Jr.
287 Appleton St. Lowell MA 01852
Immigration • Divorce • Auto Crash
▸ អន្តោប្រវេសន៍ ▸ គ្រោះថ្នាក់រថយន្ត ▸ លែងលះប្តីប្រពន្ធ
Call: Sophea or Thomas សូមទូរស័ព្ទមក: សោភា ឬធំ
978-459-5000 or 800-308-3766
Only Licensed in Massachusets




# Ideal Global Solutions, LLC

Travel & Tourism

Call: 978-944-4182/259-1730





ក្រុមហ៊ុនទេសចរណ៍

Cambodia-starts at $1,285.00

Vietnam-starts at $1,185.00

Lao-starts at $1,350.00

Thailand-starts at $1,200.00




Email: info@igslowell.com Fax:978-319-9645

# Income Tax Preparation

Reliable Professional Confidential




- Personal
- Small Business
- Amendment




**Hean Kheng**
*EdD, RTRP*

Tel:(978)764-9142 • Fax: (978)236-7266 • Email: khenghean@yahoo.com




***Lowell Document Preparation & General Services***

296 Westford Street • Lowell • Massachusetts 01851

*We speak Khmer, English, Laotian, and Thai ***យើងខ្ញុំនិយាយភាសាខ្មែរ អង់គ្លេស លាវ និង ថៃ****




# មជ្ឈមណ្ឌលថែទាំមនុស្សចាស់ក្រុងឡូវែល

**345 Chelmsford St. Lowell, MA 01851/ 978-596-1111 – www.lowelleldercare.com**

## អ្វីទៅជាមណ្ឌលថែទាំមនុស្សចាស់ក្រុងឡូវែល?

គឺជាលំនៅដ៏កក់ក្តៅមួយ ដែលផ្តល់សេវាមានកម្មវិធីជាក់លាក់ដល់សហគមន៍បំណង គឺគាំទ្រឲ្យមនុស្សចាស់ជរាអាចរស់នៅដោយឯករាជ្យខ្លួនឯង និងជួយឲ្យមានសុខុមាលភាពផ្នែកផ្លូវកាយ ផ្លូវចិត្ត និងផ្នែកសង្គម ។ កម្មវិធីរបស់យើងធានានូវបរិស្ថានរស់នៅមួយប្រកបដោយសុវត្ថិភាព និងមានបរិយាកាសដូចជាផ្ទះរបស់ពួកគាត់ ។

## ទីតាំងនៃមណ្ឌល

ទីតាំងអាចរកឃើញដោយងាយក្នុងអគារថ្មី ជាមួយនូវការតុបតែងរចនាបែបសិល្បៈខ្មែរយ៉ាងល្អប្រណិត ។ មានបន្ទប់ទទួលទានអាហារស្អាត និងមានពន្លឺគ្រប់គ្រាន់ បន្ទប់អានសៀវភៅ បន្ទប់កុំព្យូទ័រ បន្ទប់សម្រាក បន្ទប់មើលភាពយន្ត និងកន្លែងផ្សេងៗទៀតជាទីពេញចិត្តរបស់លោកអ្នក ។





## មណ្ឌលផ្តល់សេវាដល់មនុស្សចាស់

- មានរថយន្តជូនដំណើរទៅវិញទៅមកពីផ្ទះលោកអ្នក
- ការពិនិត្យ និងថែទាំសុខភាព
- ការព្យាបាលតាមរយៈការហាត់ប្រាណ
- កិច្ចការសង្គម ( ផ្តល់ការពិគ្រោះផ្ទាល់ខ្លួន និងក្រុមគ្រួសារ )
- ម្ហូបខ្មែរក្តៅៗ និងចំណីផ្សេងៗ
- ការហាត់ប្រាណសំរាប់សុខភាពរាងកាយ
- កម្មវិធីសិល្បៈ និងតន្ត្រី
- ការអប់រំពីសុខភាព
- ការពិភាក្សាលើព្រឹត្តិការបច្ចុប្បន្ន (និងការសំណេះសំណាលគ្នា)
- សកម្មភាព និងដំណើរកំសាន្តក្រៅមណ្ឌល

## Our Services

- Door-to-Door Transportation
- Medical Care and Support
- Physical Therapy
- Social Worker
- Khmer Meals and Snacks
- Adaptive Physical Exercise
- Music Programs
- Health Educational Seminars
- Discussions on current events, (and times of reminiscing)
- Outdoor Field Trips

**សូមហៅទៅលោក ខឡូ រស 978 996 6127**






☑ មិនកាត់នាទី និងមិនផុតកំណត់
☑ សម្លេងឮច្បាស់ល្អទូរស័ព្ទទៅស្រុកខ្មែរ

**4.5¢ per min**

| | Bonus (10%) | Min |
|---|---|---|
| $10.00 | $1 | 224 |
| $20.00 | $2 | 448 |
| $50.00 | $5 | 1,122 |
| $100.00 | $10 | 2,244 |

**Buy here and get 10% more!**

Tel: (978) 942 1641/ (978) 656 8141
(267) 253 3947

www.cambodiaphonecard.us





**SIM'S Home Improvement**
Major Sim Enterprises, Inc.




Repairing •Remodeling •Additions
ជួសជុល កែលំអរ សង់បន្ថែម

- Kitchen ចង្ក្រានបាយ
- Livingroom បន្ទប់ទទួលភ្ញៀវ
- Bathroom បន្ទប់ទឹក
- Bedroom បន្ទប់ដេក
- Roofing ដំបូល
- Siding ជញ្ជាំង
- Window បង្អួច
- Door ទ្វារ
- Basement ជាន់នៅក្រោមដី
- Additions បន្ទប់បន្ថែម

Residential • Commercial • Industrial
ទទួលប្រាក់គ្រប់ប្រភេទ
Bank Loan, Insurance, Compensation, Credit Debit, Check &Cash
More information call: 1.978.452.7467

www.SimsHomeImprovement.com
Boreth@SimsHomeImprovement.com

# ខ្មែរអ្នកជាតិនិយម

តពីលេខមុន

ស្តេចយួនខាងត្បូងឈ្មោះ ហ្វេ វឿង (ខ្លះថា សៃវួង) ជាឪពុកក្មេករបស់ស្តេចខ្មែរឈ្មោះ ជ័យ ជេដ្ឋាទី២ បានភៀសខ្លួនទៅកម្ពុជាក្រោមរួចត្រូវគេសម្លាប់នៅឆ្នាំ ១៧៧៧ ។ ក្មួយប្រុសរបស់ស្តេច ហ្វេ វឿង ឈ្មោះ ង្វៀង អាន់ ជាអ្នកបន្តរាជ្យ ក៏បានកេណ្ឌទ័ពច្បាំងជាមួយបងប្អូនតៃសឺង ។ ឆ្លៀតឱកាសក្នុងចម្បាំងផ្ទៃក្នុងនេះ មេគណកាតូលិកជាជនជាតិបារាំងនៅកម្ពុជាក្រោមឈ្មោះ ដឺបេអែន (De Behaine) ក្នុងឋានៈខ្លួនជាមិត្តស្និទស្នាលរបស់ស្តេច ង្វៀង អាន់ ក៏បានជម្រុញ ង្វៀង អាន់ ឱ្យស្នើសុំជំនួយពីប្រទេសបារាំងដែលគាត់នឹងជួយធ្វើការទាក់ទងឱ្យ ។ បន្ទាប់ពីចម្បាំងអស់រយៈពេល៥ឆ្នាំដែលមិនបានជោគជ័យសោះនោះស្តេច ង្វៀង អាន់ ក៏យល់ស្របតាមយោបល់នៃមេគណដឺបេអែន ។ នៅឆ្នាំ១៧៨៧ មេគណដឺបេអែនបានទៅដល់ប្រទេសបារាំងដោយបាននាំកូនច្បងរបស់ ង្វៀង អាន់ ដែលមានអាយុ៥ឆ្នាំទៅជាមួយផង ។ នៅពេលនោះបារាំងកំពុងតែបោះបង់ចោលអាណានិគមរបស់ខ្លួននៅទ្វីបអាមេរិកខាងជើង គឺប្រទេសកាណាដា ។ ដោយឃើញថា ខ្លួនចាញ់ ប្រៀបអង់គ្លេសនៅទ្វីបអាស៊ីបារាំងក៏សុខចិត្តចុះសន្ធិសញ្ញាសម្ព័ន្ធភាពទី១ ជាមួយយួននៅវែកសៃ (Versailes) ក្នុងថ្ងៃទី


និពន្ធដោយ ឡឹក សំអឿន ហៅ "ផ្កាយព្រឹក"

៨ វិច្ឆិកា ១៧៨៧ ដែលនៅក្នុងសន្ធិសញ្ញានោះចែងថា បារាំងត្រូវផ្តល់ជំនួយយោធាដល់ ង្វៀង អាន់ ហើយប្រទេសយួនក៏ត្រូវប្រគល់កោះច្រឡាច និងកំពង់ផែទូរ៉ានទៅឱ្យប្រទេសបារាំងដែលមានកម្មសិទ្ធផ្តាច់មុខក្នុងមុខជំនួញ ។

នេះជាជំហ៊ានដំបូងនៃការយកឥណ្ឌូចិនជាអាណានិគមរបស់បារាំង ក៏ប៉ុន្តែនៅពេលមេគណដឺបេអែនត្រឡប់មកពីប្រទេសបារាំងវិញនោះ ង្វៀង អាន់ វាយយកបានខេត្តព្រៃនគរព្រមទាំងដែនដីទិសខាងត្បូងនៃស្រុកអណ្ណាមទាំងមូលដោយសារមានជំនួយពីស្តេចសៀមដែលបានបញ្ជាក់កងទ័ពខ្មែរមួយកងឱ្យទៅកាន់ក្រុងហ្វេក្នុងឆ្នាំ១៨០០ ដើម្បីជួយស្តេច ង្វៀង អាន់ ឱ្យតទល់នឹងពួកតៃសឺងជាចុងក្រោយបង្អស់នៅឯហាណូយរួចក៏ប្រកាសខ្លួនជាអធិរាជ យ៉ាឡុង ហើយថែមទាំងបានទទួលការគាំពារពីប្រទេសចិនទៀតផង ។

អធិរាជ យ៉ាឡុង បានអភិសេកនៅហាណូយក្នុងឆ្នាំ ១៨០៨ ក្រោមអធិបតីភាពនៃអធិរាជចិនឈ្មោះ តា គីង ដែលជាអ្នកបានដាក់ឈ្មោះប្រទេសយួនថា "វៀតណាម"ដែលរួមទាំងតុងកឹង,អណ្ណាម ហើយនឹងកូសាំងស៊ីនផង ។ ចាប់តាំងពីពេលនោះឯងហើយ ដែលជនជាតិបារាំងភាគច្រើនជាអ្នកផ្សាយសាសនាគ្រីស្ត និងអ្នកជំនួញបានរស់នៅដោយសុខស្រួលក្រោមកិច្ចការពាររបស់អធិរាជយ៉ាឡុង ។ ប៉ុន្តែក្រោយមកក្នុងរជ្ជកាល មិញយ៉ាង និងទីឌឹក បណ្តាជនជាតិយួនដែលធ្លាប់ជាអ្នកឈ្នះសង្គ្រាមក្នុងភូមិភាគនេះ មិនសម្តែងស្វាគមន៍ចំពោះជនបរទេសឡើយ ។ តែថែមទាំងមានសេចក្តីសង្ស័យថា ពួកអ្នកផ្សាយសាសនាទាំងនេះ គឺជាផែនការដំបូងរបស់បារាំងដើម្បីត្រួតត្រាមកលើទឹកដីយួន ។ អាស្រ័យហេតុនេះ ការធ្វើទុក្ខបុកម្នេញទៅលើពួកអ្នកផ្សាយសាសនាក៏បានចាប់ផ្តើម ឡើងសាជាថ្មីម្តងទៀត ។

ឯស្តេច ណាប៉ូឡេអុង ទី៣ ដោយមានកងកម្លាំងខ្លះរបស់ខ្លួននៅឥណ្ឌូចិនស្រេចទៅហើយនោះបានយកលេសថានឹងដាក់ទណ្ឌកម្មទៅលើអធិរាជទីឌឹក អំពីបទសម្លាប់រង្គាលនូវពួកអ្នកផ្សាយសាសនាគ្រីស្ត រួចក៏បានបញ្ជាឱ្យលើកទ័ពមួយកងវាយយួន និងបញ្ជូនទ័ពមួយកងទៀតទៅប៉េកាំងប្រទេសចិនក្នុងគោលបំណងដណ្តើមជាមួយអង់គ្លេសនូវកម្មសិទ្ធិផ្តាច់មុខខាងផ្លូវជំនួញ ។

នៅថ្ងៃទី ៣១ សីហា ១៨៥៨ នាវាចម្បាំងមួយកងដែលមានពលទាហានចំនួន៣០០នាក់ ក្រោមបញ្ជាការរបស់ឧត្តមនាវី រីហ្គោ ដឺ ឈីណូយី (Rigore de Chenoyi) បានបោះយុទ្ធការសំចតនៅឆកសមុទ្រទូរ៉ានដែលទីដៅនៃការវាយប្រហារ គឺទីក្រុងហ្វេ ។ ប៉ុន្តែដោយនាវាបាញ់កាំភ្លើងធំរបស់ខ្លួនពុំអាចចូលតាមដងស្ទឹងហ្វេបាន Rigore Chenoyi ក៏សម្រេចចិត្តដូរទិសដៅថា តើត្រូវទៅតុងកឹង ឬក៏កម្ពុជាក្រោម ។ គាប់ជួនពេលនោះខ្យល់រំហើយរដូវរងារជួយច្រាននាវាមកកម្ពុជាក្រោម ។ យ៉ាងរហ័សជាងនោះឧត្តមនាវីក៏សម្រេចចិត្តថា នឹងវាយយកក្រុងព្រៃនគរដែលពេលនោះឋិតនៅក្រោមការត្រួតត្រារបស់យួន ។ កងនាវាបារាំងក៏បានមកទិសដៅខាងត្បូងចូលតាមដងស្ទឹងនៃទន្លេព្រៃនគររួចវាយសម្រុកចូលយកទីក្រុងព្រៃនគរ នៅថ្ងៃទី១៧ កុម្ភៈ ១៨៥៧ ប៉ុន្តែកងទ័ពបារាំងទាំងនោះបានត្រូវកងទ័ពយួនឡោមព័ទ្ធ ។ បារាំងក៏បានស្នើសុំប្តូរកុងស៊ុលជាមួយយួន ប៉ុន្តែស្តេចយួន ទីឌឹក បដិសេធ ព្រោះឃើញថា កងទ័ពបារាំងមានចំនួនតិចស្តួចស្តើងពុំអាចតស៊ូ និងការឡោមព័ទ្ធ តទៅលេខក្រោយ

NEW ENGLAND INSTITUTE OF HVAC, Inc.
វិទ្យាស្ថានញូអិនគ្លិនជំនាញខាងបង្រៀនពី
ម៉ាស៊ីនកំដៅ, ម៉ាស៊ីនត្រជាក់ និងទូទឹកកក
ថ្នាក់រៀនពេលថ្ងៃ និងពេលល្ងាច និងផ្តើមឆាប់ៗនេះ
បំពេញការសិក្សាបច្ចេកទេសខាងម៉ាស៊ីនត្រជាក់
ម៉ាស៊ីនកំដៅ ទូទឹកកក HVAC គឺសិក្សា
តែរយៈពេល១៣សប្តាហ៍
• សិក្សាដោយពិសោធន៍ផ្ទាល់ដៃ • ជួយរកការងារធ្វើ
• ផ្តល់សម្ភារៈឱ្យ • ថ្នាក់រៀនសិស្សតិច
• GI Bill Education Benefits Approved
• Section 30 Approved
NATE Certifications, EPA Testing, OSHA, and Financing Available to those who qualify
គឺជាប្រភពសម្រាប់ថាមពលបៃតង
Call for details: 978.735.4979
NEW ENGLAND INSTITUTE OF HVAC, INC
240 Smith St., Lowell, MA 01851
www.newenglandhvac.com

MARCOTTE LAW FIRM
ក្រុមហ៊ុនមេធាវី Marcotte
45 MERRIMACK STREET
LOWELL, MASSACHUSETTS
(978) 458-1229
• សេចក្តីគ្រោះថ្នាក់ដល់រូបរាងកាយ
• ពិការភាពដោយសន្តិសុខសង្គម • គ្រោះថ្នាក់ចរាចរណ៍
• បទព្រហ្មទណ្ឌផ្លូវភេទ និងថ្នាំញៀន • គ្រោះថ្នាក់នៅការដ្ឋាន
• ច្បាប់គ្រួសារ និងលែងប្តីប្រពន្ធ
• បើកបរនៅពេលស្រវឹង និងប្រព្រឹត្តបទល្មើសពេលធ្វើចរាចរណ៍
• Personal Injury • Family Law & Divorce
• Disability • Traffic Accidents
• Sex & Drug Crimes, OUI • Work Accidents
មានបុគ្គលិកនិយាយភាសាខ្មែរលោកអ្នកអាចហៅទូរស័ព្ទ
មកក្រុមហ៊ុនយើងខ្ញុំដើម្បីពិគ្រោះ
(978) 458-1229
www.marcottelawfirm.com

# អ្នកក្រ និងអ្នកមាននៅប្រទេសខ្មែរ ភាគទី៤



គីម សុស មន្ត្រីចូលនិវត្ត ក្រសួងការបរទេស សហរដ្ឋអាមេរិក

**តពីលេខមុន**

ថ្ងៃមុននៅចុងក្រោយបង្អស់នៃភាគទី៤ និយាយអំពីរឿងអ្នកក្រអ្នកមាននេះ ខ្ញុំបានជម្រាបថា ខ្ញុំនឹងជម្រាបអំពី "អ្នកមានចង់មានពេកភ្លេចគិតដល់អ្នកក្រ" ។

រឿងថាភ្លេកគិតនេះ ក៏ថាបាន។ ព្រោះថានេះជារឿងទូទៅរបស់មនុស្ស ។ កាលណាយើងស៊ប់ ឬងប់តែនឹងអ្វីមួយហើយ យើងច្រើនតែភ្លេកអ្វីឯទៀត។ ប៉ុន្តែតាមបទពិសោធន៍របស់ខ្ញុំ រឿងថា "អ្នកមានចង់មានពេកភ្លេកគិតដល់អ្នកក្រ" នេះមានករណីតិចណាស់បើមានមែន ។ តែផ្ទុយទៅវិញ ករណីភាគច្រើន ច្រើនតែមិនគិតដល់អ្នកក្រ ព្រោះចង់មានពេកចង់មានឱ្យបានឆាប់រហ័សគ្មានគិតដល់អ្នកណាក្រៅពីខ្លួនឯងទេ។

ហើយម្យ៉ាងទៀត រឿង "ចង់មានពេកចង់មានឱ្យបានឆាប់រហ័ស" តាមការសង្កេតរបស់ខ្ញុំជាបញ្ហាទូទៅក្នុងជំនួញទូទៅនៅពិភពលោក ដូចជានៅសហរដ្ឋអាមេរិកជាដើម។ នៅសហរដ្ឋអាមេរិកប្រមាណ៥០០នាក់នៃពលរដ្ឋប្រមាណ៣១៤លាននាក់ជាអ្នកមានអណ្តែតដាច់ផុតពីគេដែលជាភាសាអង្គ្លេស Super- Rich ។ ហើយចំពោះមនុស្សមួយភាគតូចមួយនេះ គឺជាង១ភាគរយនៃពលរដ្ឋរួមនឹងចំនួនអ្នកមានមធ្យមនៃជនជាតិអាមេរិកាំងឯទៀតផង រដ្ឋាភិបាលសហរដ្ឋអាមេរិកកំពុងរិះរកមធ្យោបាយធ្វើយ៉ាងដូចម្តេចឱ្យ



អ្នកក្ររកទឹកបង់សំណាញ់ស្ទើរមិនបាន

ធនធាន គឺលុយនៃក្រុមអ្នកមាននេះចេញទៅជួយអ្នកឯទៀតដោយបង្កើតការងារឱ្យអ្នកឯទៀតនោះធ្វើ និងជួយរដ្ឋាភិបាលដោយបង់ពន្ធឱ្យបានច្រើនជាងចំនួនដែលត្រូវបង់ឥឡូវនេះដើម្បីបង្កើនប្រាក់ចំណូលទៅថវិការជាតិ។ ត្រង់នេះយើងអាចនិយាយបានថា រដ្ឋាភិបាលអាមេរិកាំងមិនចាំអ្នកមានគិតទៅដល់អ្នកក្រទេ ឬក៏យើងអាចនិយាយបានថា រដ្ឋាភិបាលអាមេរិកាំងមិនសង្ឃឹមថាអ្នកមានអាមេរិកាំងភាគច្រើនគិតដល់អ្នកក្រដែរ។ ព្រោះថាអ្នកមានកាន់តែមានច្រើនឡើងច្រើនឡើង ហើយលឿនឡើងលឿនឡើង។ហើយចំនួនអ្នកអត់ការធ្វើជួនកាលឡើងជួនកាលចុះ។

ដូច្នេះរដ្ឋាភិបាលត្រូវចាត់វិធាការដើម្បីធានាស្ថេរភាព និងភាពចម្រុងចម្រើនរបស់ស្រុក។

ចំពោះស្រុកខ្មែរវិញ អ្នកមានមិនត្រូវយករឿងភ្លេកគិតដល់អ្នកអត់ការធ្វើ និងអ្នកក្រមកជជែកដេញដោលឱ្យខាតពេលទេ។ អ្នកមានត្រូវចាប់ផ្តើមរកមធ្យោបាយបង្កើតការងារដើម្បីកាត់បន្ថយចំនួនអ្នកអត់ការធ្វើ និងចំនួនអ្នកក្រដែលនៅក្នុងចំនួននេះមានប្រមាណ៨០ភាគរយពឹងផ្អែករបរកសិកម្មឱ្យបានឆាប់រហ័ស ។ អ្នកមានអាចថា បានថារឿងកាត់បន្ថយនេះជាភារកិច្ចរបស់រាជរដ្ឋាភិបាល ។ ប៉ុន្តែតើអ្នកមានអាចធ្វើខ្លួនឯងដោយមិនចាំបាច់មានការគាបសង្កត់ពីណាមួយមកបានទេ ?

អ្នកមាននៅស្រុកខ្មែរ ជាពិសេសអ្នកមានខ្មែរ ត្រូវសួរខ្លួនឯងមើលថាតើសព្វថ្ងៃនេះព្រួយបារម្ភអ្វីឬទេ នៅវេលានេះដែលមានចំនួនអ្នកអត់ការធ្វើនិងអ្នកក្រកាន់តែច្រើនឡើងច្រើនឡើង កាន់តែក្រទៅក្រទៅ ហើយចំនួនអ្នកមានស្ទើរតែនៅដដែលកាន់តែមានឡើងមានឡើង? អ្នកមានខ្មែរ មើលឃើញទេថាផ្ទះខ្លួនធំដាច់គេមានរបងខ្ពស់មានអ្នកយាមរាល់ពេលវេលា? អ្នកមានខ្មែរដឹងខ្លួនទេថាខ្លួនមានលុយច្រើនមានមាសពេជ្រមានសំលៀកបំពាក់ល្អលើសពីគេឯងមានឡានទំនើបជិះដៃឡេរាប់ម៉ឺនដុល្លាសហរដ្ឋអាមេរិកទៅណាមកណាត្រូវមានអង្គរក្សតាមការពារ? អ្នកមានខ្មែរដឹងទេថារាល់ថ្ងៃខ្មែររាប់រយនាក់ចេញតាមច្បាប់ឬមិនតាមច្បាប់ពីស្រុកខ្មែរទៅធ្វើជាកម្មករនៅក្រៅស្រុក? អ្នកមានខ្មែរដឹងទេថាខ្មែរស្ទើរតែរាល់ស្លាប់តាមផ្លូវចូលខុសច្បាប់ដល់ដីថៃ? អ្នកមានខ្មែរដឹងទេថា កម្មកររោងចក្រនៅស្រុកខ្មែររាប់សែននាក់បានប្រាក់ខែមិនគ្រប់គ្រាន់គាំទ្រជីវិត ហើយបន្ថែមលើនោះមានខ្លះដួលសន្លប់នៅពេលធ្វើការស្ទើរតែរាល់ថ្ងៃ? អ្នកមានខ្មែរដឹងទេថា ខ្មែរនៅស្រុកខ្មែរយ៉ាងតិច៨០ភាគរយវេទនាណាស់? អ្នកមានខ្មែរដឹងទេថាមានខ្លះបន់ឱ្យមានព្រឹត្តិការណ៍នៅស្រុកខ្មែរដូចព្រិត្តិការណ៍នៅខែមេសាឆ្នាំ៧៥? ទាំងអស់គ្នាចាំទេថា

**តទៅទំព័រទី ១៦**

# កម្មវិធីបង្រៀនពីលុយដល់កុមារ

**ខ្មែរផុស ស.រ.អា**

កាលពីមុនខ្មែរផុសស.រអា បានរាយការណ៍ពីកុមារនៅសាលាបឋមសិក្សា"មូឌី"រៀនពីលុយដែលបានធ្វើឱ្យយើងចាប់អារម្មណ៍ ។ ស្ថានភាព



វិជ្ជកា ខង

ដែលយើងបានចាត់ទុកជាចម្លែកនោះ គឺសហគមន៍អាស៊ីយើងក្រៅពីគ្រួសារចិនចេញ "ពុំមានទស្សនៈឱ្យតម្លៃទៅចំណេះសន្សំ និងចាយលុយទេ តែចង់បានលុយច្រើន" គេនាំគ្នានិយាយថា "លុយនាំឱ្យមនុស្សវិលវល់ប្រាសចាកភាពសុចរិត-ចិត្តទូលាយ" ខ្លះទៀតយល់ថា "កាន់លុយជាអំពើបាប"ថែមទៀត... ក៏ប៉ុន្តែនាង វិជ្ជកា ខង តំណាងឱ្យធនាគារ "វ៉ាស៊ីនតោនសេវិងប៊ីង"បានចេញទៅបង្ហាត់បង្ហាញអំពីលុយដល់កុមារនៅសាលា"មូឌី" និងសាលាផ្សេងៗ ទៀតដូចជា"លីងកិន"និង"ម័រី"យ៉ាងព្យាយាមតាំងពី៥ឆ្នាំរួចមកហើយ ។

វិជ្ជកា ខង ជាយុវនារីខ្មែរម្នាក់ដែលកំពុងតែបណ្តុះវប្បធម៌ថ្មីរបស់សហគមន៍ខ្មែរដែលពាំនាំទម្លាប់ពីសង្គមក្រីក្ររបស់ប្រទេសខ្លួន មកឱ្យអនាគតពលរដ្ឋនៃស.រ.អា ដើមកំណើតខ្មែរអាចមានជីវភាពប្រសើរក្នុងប្រទេសដែលគេប្រើ "លុយ"សម្រាប់រស់នឹងអភិវឌ្ឍន៍នាសហរដ្ឋអាមេរិកនេះ ។ ក្នុងន័យនេះយើងឃើញថា ខង វិជ្ជកា និងត្រូវការភាពមាំទាំ ការព្យាយាម ជំនឿទៅលើទង្វើរបស់ខ្លួន ជំនឿពីសាលារៀន ជាពិសេសការគាំទ្រមាតាបិតា កុមារអាស៊ីយ៉ាងចេញមុខ ។

យើងបានទៅជួបថ្នាក់ដឹកនាំនៃ"ធនាគារដាក់ប្រាក់សន្សំ"វ៉ាស៊ីនតោន"នៅឡូវែល គឺលោក ស្ទួន ឡូយដន ជាអនុប្រធាន ដើម្បីចង់ដឹងអំពីកម្មវិធីសន្សំ និងគ្រប់គ្រងលុយនោះថា "តើនឹងមានទំហំ និងដំណើរឆ្ងាយប៉ុណ្ណា?" យើងបានដឹងថា នាង វិជ្ជកា បានបង្ហាត់បង្ហាញពីមូលដ្ឋាននៃការអប់រំកម្មវិធី៤៥នាទី នាថ្ងៃសុក្រ នៅគ្រប់ក៏រិតថ្នាក់ពីខែ វិច្ឆិកា ដល់ខែមិថុនា ។ កម្មវិធីនោះមានប្រធានបទ: លុយជាអ្វី? -លុយមកពីណា? -ពិភពនៃការងារ -បានលុយយកមកធ្វើអ្វី? -ហេតុអ្វីក៏គេសន្សំលុយ -តើធនាគារអ្វីខ្លះ -តើធនាគារមានដំណើរយ៉ាងណា?...ទាំងនេះសុទ្ធតែជាចំណេះដែលពលរដ្ឋអាមេរិកាំង និងពិភពលោកនៃសេដ្ឋកិច្ចប្រើប្រាស់រៀងរាល់ថ្ងៃ...ហើយសហគមន៍ខ្មែរនៅស.រ.អានេះក៏ត្រូវប្រើចំណេះនេះដូចគេឯងដែរ ។ បន្ថែមលើកម្មវិធីសិក្សានោះនាង វិជ្ជកា ខង បានអនុញ្ញាតិឱ្យកុមារជាសិស្ស អាចដាក់ប្រាក់សន្សំក្នុង"កូនជ្រូករបស់ខ្លួន"ទៅក្នុង"ធនាគាររបស់ខ្លួន" ជាលក្ខណ:ផ្លូវការបានថែមទៀត ដែលជាវិធីជាក់ស្តែងមួយសំរាប់បង្កើតទម្លាប់ "សន្សំលុយ"ដែលគេអាចឃើញ និងជឿបានតាំងពីកុមារភាព ។

វិជ្ជកា ខង និយាយថា "ខ្ញុំបង្រៀនក្មេងក៏រិតថ្នាក់ទី៣ និងទី៤ចំនួន៥៣០នាក់ អំពីសារសំខាន់នៃការបានលុយពីការងារ និងការសន្សំលុយ ហើយបានបើកគណនេយ្យ "Super Savers" ឱ្យសិស្សចំនួន២០០ ហើយធនាគាររក្សាប្រាក់សន្សំឱ្យកុមារសាលា"មូឌី"សាលា "លីងកិន" និងសាលា "ម័រី"បានចំនួនប្រាក់១៨,៣៥៣.១០សេនហើយ...។ នេះជាប្រាក់សន្សំសម្រាប់សិស្សគ្រប់សាសន៍ ដែលមានមាតាបិតាគាំទ្រដល់កម្មវិធីរបស់ធនាគារ



សន ឡាយដន និងជាមួយខ្មែរផុស

សន្សំប្រាក់វ៉ាស៊ីនតោនសេវីងប៊ីង ។

យើងបានឃើញចំនួនសិស្សអាស៊ីប្រមាណជា១០%នៃចំនួនសិស្សសាលាមូឌីនេះទោះជាតិចក្នុងតំបន់ដែលមានខ្មែរច្រើនរស់នៅក៏នេះ ប្រាកដជាសំណាងនៃអ្នកទាំងនោះ ដោយសារពុំមាន



សិស្សយកប្រាក់សន្សំមកដាក់ធនាគារ

កម្មវិធីអប់រំបែបនេះសម្រាប់ជួយកុមារនៅសាលារៀន ឬក្នុងគ្រួសារនិមួយៗទេ រីឯសង្គមនៅតែវិវត្តន៍ជាមួយនឹងការប្រើលុយមិនឈប់ឈរតែដដែល ៕



# ភិក្ខុ លួន សុវ៉ាត "ជីវិតពលរដ្ឋ ខ្មែរនៅស្រុកខ្មែរមានតម្លៃថោកជាងឆ្កែ នៅអាមេរិក"

**ដោយៈ អ៊ុម ឿម**

ជ័យលាភីអ្នកការពារសិទ្ធិមនុស្សអន្តរជាតិ ឆ្នាំ២០១២ (Martin Ennals Award for Human Rights Defenders) ព្រះតេជគុណ លួន សុវ៉ាត សច្ចមុនី ជាសង្ឃខ្មែរមួយអង្គដែលតែងតែបង្ហាញនូវវត្តមានរបស់ព្រះអង្គជាញឹកញាប់ក្នុងការតស៊ូមតិ និងតែងតែឈឺឆ្អាលចំពោះការរំលោភបំពាននានាពីសំណាក់អាជ្ញាធរសមត្ថកិច្ចក្នុងការបណ្តេញប្រជាពលរដ្ឋចេញពីលំនៅដ្ឋានដោយគ្មានសំណងសមស្រប ។ ការបំផ្លាញសម្បត្តិធនធានធម្មជាតិ, ព្រៃឈើ, ការផ្តល់ដីសម្បទានសេដ្ឋកិច្ចដល់ក្រុមហ៊ុនបរទេសក្នុងរយៈពេលដ៏យូរដល់ទៅ៩៩ឆ្នាំ គឺជាអ្វីដែលព្រះសង្ឃអង្គនេះប្រយុទ្ធប្រឆាំង និងការពារកុំឱ្យកើតមានឡើងក្នុងសង្គមកម្ពុជា ។

ដោយសារតែសកម្មភាពសង្គម និងសកម្មភាពមនុស្សធម៌បែបនេះហើយ ទើបព្រះតេជគុណ លួន សុវ៉ាត ក្លាយជាបន្លានៅក្នុងកែវភ្នែករបស់អាជ្ញាធរសមត្ថកិច្ច ជាពិសេសរដ្ឋាភិបាលខ្មែរតែងមិនសប្បាយចិត្តចំពោះអ្វីដែលសកម្មភាពសង្គមបែបនេះ ។

ក្រៅពីនិមន្តត្រាច់ចរនៅក្នុងប្រទេសកម្ពុជាពីកន្លែងមួយទៅកន្លែងមួយភិក្ខុ លួន សុវ៉ាត ក៏ត្រូវបាននិមន្តទៅកាន់បណ្តាប្រទេសចំនួននៅអឺរ៉ុប និងសហរដ្ឋអាមេរិកផងដែរ ។ ក្នុងខណៈដែលព្រះសង្ឃជាទីរលឹកអង្គនេះ គង់នៅក្នុងទីក្រុងហ្វីឡាដែលហ្វៀភិក្ខុ លួន សុវ៉ាត ត្រូវ បានពលរដ្ឋខ្មែរដែលជាពុទ្ធសាសនិកជន, អ្នកសង្គម, និងអ្នកនយោបាយនិមន្តឡើង សម្តែងព្រះធម៌ទេសនាទាក់ទងនឹងភាព សាសនា និងសង្គមកម្ពុជានាពេលបច្ចុប្បន្ន ។ នៅឯ"វត្តព្រះពុទ្ធប្រទានពរ" និងវត្ត"ព្រះពុទ្ធរង្សី" នាទីក្រុងហ្វីឡាដែលហ្វៀខាងត្បូងកាលពីថ្ងៃទី៥ និងថ្ងៃទី៦មករាកន្លងមកនេះ, ព្រះភិក្ខុ លួន សុវ៉ាត ត្រូវបានទទួលបដិសណ្ឋារកិច្ចយ៉ាងកក់ក្តៅពីសំណាក់ពុទ្ធសាសនិកជន, និងក្រុមអ្នកនយោបាយ...។ អ្វីដែលជាការកត់សម្គាល់នោះ ភិក្ខុ លួន សុវ៉ាត ត្រូវបានទទួលនូវប្រកាសនីយ៍ប័ត្រលើកទឹកចិត្តពីប្រតិភូនៃគណបក្សសង្គ្រោះជាតិប្រចាំតំបន់ក្នុងន័យគាំទ្រនូវសកម្មភាពមនុស្សធម៌របស់ព្រះអង្គ ។

មានសំនៀងបែបរជីន១ជាកុលបុត្រខ្មែរមកពីដែនអង្គរខេត្តសៀមរាប ភិក្ខុ លួន សុវ៉ាត មានសង្ឃដីការយ៉ាងមុតមាំថា: ទោះបីជាមានការគំរាមកំហែងពីសំណាក់អាជ្ញាធរសមត្ថកិច្ច និងធ្លាប់មានការចាប់ខ្លួនមួយរយៈនេះពីសំណាក់ក្រុមប៉ូលិស នាគ្រាកន្លងមកយ៉ាងណាក៏ដោយចុះ ក៏អាត្មានៅតែបន្តធ្វើកិច្ចការសង្គមជាបន្តទៀត... ។ នេះជាអ្វីដែលភិក្ខុ លួន សុវ៉ាត មានសង្ឃដីការ ។



ភិក្ខុ នួន សុវ៉ាត នៅម៉ាសាឈូសែត

សកម្មជនអ្នកការពារសិទ្ធិមនុស្សអង្គនេះមានសង្ឃដីការបែបចំអកឡកឡឺយទៅកាន់រដ្ឋាភិបាលខ្មែរថា: បច្ចុប្បន្ននៅឯប្រទេសកម្ពុជា គឺជាប្រទេសសេរី, បណ្តេញប្រជាពលរដ្ឋខ្មែរចេញពីលំនៅដ្ឋានដោយសេរី និងចាប់មនុស្សដាក់ពន្ធនាគារដោយសេរី ។ សង្ឃអង្គនេះមានសង្ឃដីការធ្ងន់ៗថា ជីវិតមនុស្សនៅឯប្រទេសកម្ពុជាសព្វថ្ងៃនេះ មានតម្លៃថោកជាងសត្វសុនខ(ឆ្កែ)នៅសហរដ្ឋអាមេរិកទៀត ព្រោះសត្វទាំងនោះត្រូវបានទទួលនូវការយកចិត្តទុកដាក់យ៉ាងខ្ពស់ពីសំណាក់រដ្ឋាភិបាល ។រីឯជីវិតមនុស្សនៅឯប្រទេសកម្ពុជាវិញ ហាក់គ្មានតម្លៃបន្តិចណាសោះ ព្រោះរាល់ករណីឃាតកម្មនានាហាក់គ្មានចេតនារែកមុខរកឃាតកយកមកផ្តន្ទាទោសឡើយ, តួយ៉ាងណា ដូចករណីការបាញ់សម្លាប់លោក ជា វិជ្ជា ប្រធានសហជីពសេរីកម្ពុជា,ការបាញ់សម្លាប់លោក ឈុត វុទ្ធី សកម្មជនការពារសមម្បត្តិធម្មជាតិ, ការធ្វើ ឃាតលើព្រះគ្រូ សម ប៊ុនធឿន កាលពីឆ្នាំ ២០០១, ការបោះសម្លាប់អ្នកកាសែតជាច្រើន រូប និងថែមទាំងការបាញ់ប្រហារលើអ្នកសិល្បៈដូចជាសត្វធាតុ...។

តាមការឱ្យដឹងពីភិក្ខុ លួន សុវ៉ាត បានឱ្យ "ខ្មែរផុស"ដឹងថា ព្រះអង្គនឹងនិមន្តទៅកាន់ប្រទេសកម្ពុជាវិញនៅខែ កុម្ភៈ ខាងមុខនេះ ហើយក៏គ្មានការភ័យខ្លាចចំពោះសន្តិសុខសុវត្ថិភាពផ្ទាល់ព្រះអង្គឡើយ ហើយថែមទាំងប្តេជ្ញាបន្តនូវសកម្មភាពសង្គមបែបនេះជារហូត ទោះបីជាគ្មានវត្តអារាមសម្រាប់គង់នៅជាអចិន្ត្រៃយ៍យ៉ាងណាក៏ដោយចុះ ។

តាមការស្រាវជ្រាវរបស់"ខ្មែរផុស"បានរកឃើញថា: ក្នុងចំណោមព្រះសង្ឃជាទីគោរពរបស់ខ្មែរចំនួន៧អង្គ ដូចជា ព្រះអាចារ្យ ហែម ចៀវ , សម្តេចព្រះសង្ឃរាជ ជួន ណាត, សម្តេចសង្ឃរាជ ហួត តាត, ព្រះគ្រូ ប៉ាង ខាត់វីរិយៈតោ, ព្រះគ្រូធម្មបាល ខៀវ ជុំ, ព្រះគ្រូធម្មឃោសាចារ្យ សេក នាង, ព្រះមហា ឃោសន្ទ វ៉ា យ៉ាវ ក្នុងនោះ ព្រះភិក្ខុ លួន សុវ៉ាត សច្ចមនី ក៏ត្រូវបានប្រវត្តិសាស្ត្ររាប់បញ្ចូលថា ជាព្រះសង្ឃជាទីរលឹកផងដែរ ។

**ជីវប្រវត្តិសង្ខេប**

ព្រះភិក្ខុ លួន សុវ៉ាត កើតនៅថ្ងៃពុធ ទី១១ ខែវិច្ឆិកា ឆ្នាំ ១៧៧៩ នៅភូមិភ្លៀត ឃុំជីក្រែង ខេត្តសៀមរាប ជាគ្រួសារកសិករ ។

ដល់ឆ្នាំ១៩៩៥ សាមណេរ លួន សុវ៉ាត បានបន្តការសិក្សារៀនសូត្រវិប្បស្សនាធុរៈជាមួយព្រះគ្រូកេតុធម្មោ សម ប៊ុនធឿន នៅពុទ្ធមណ្ឌលវិបស្សនាធុរៈនៃព្រះរាជាណាចក្រកម្ពុជានៅភ្នំអដ្ឋរស្សខេត្តកណ្តាល ។

ក្នុងឆ្នាំ១៩៩៩ បានមកគង់នៅវត្តឧណ្ណាឡោមក្រុងភ្នំពេញដោយបានបន្តសិក្សារៀនសូត្រផ្នែកគន្ថធុរៈភាសាបាលីនៅពុទ្ធិកៈវិទ្យាល័យព្រះ-សុរាម្រិត និងសកលវិទ្យាល័យព្រះសីហនុរាជ



ភិក្ខុ នួន សុវ៉ាត ទទួលសញ្ញាប័ត្រកោតសរសើរពី សកម្មភាពសិទ្ធិមនុស្សពីសាលាក្រុងលីន

រហូតបានបញ្ចប់ថ្នាក់កំរិតបរិញ្ញាប័ត្រទស្សនៈវិទ្យានៅឆ្នាំ២០១០ ។

នាថ្ងៃទី២២ មិនា ឆ្នាំ២០០៩ បងប្រុស និងក្មួយប្រុសត្រូវបានកងប្រដាប់អាវុធបាញ់ឱ្យរបួសព្រមទាំងញាតិញោម៤៣នាក់ផ្សេងទៀតត្រូវបានចាប់ខ្លួន ព្រោះជម្លោះដីធ្លី ។ ពេលនោះឯងជាពេលដែលភិក្ខុ លួន សុវ៉ាត បានបំពេញនូវកាតព្វកិច្ចជាអ្នកបួសដោយពួកគេដោយឈរលើគោលការណ៍ព្រហ្មវិហារធម៌ និងកិច្ចការពារសិទ្ធិមនុស្សរបស់ព្រះពុទ្ធជាម្ចាស់ ។

**ការគំរាមចាប់ផ្សឹក និងហាមមិនឱ្យគង់នៅវត្តនានា**

មកដល់ថ្ងៃទី២៤ ខែមេសា ឆ្នាំ២០១២ ព្រះតេជគុណ លួន សុវ៉ាត ត្រូវបានសម្តេចសង្ឃ ននូ ង៉ែត ចេញលិខិតបណ្តេញពីវត្តឧណ្ណាឡោម និងហាមគ្រប់វត្តទូទៅនៅភ្នំពេញមិនឱ្យគង់នៅឡើយ ។

ប៉ុន្តែព្រះអង្គបានបន្តស្នាក់នៅវត្តឯស្រុកកំណើតនៅឯខេត្តសៀមរាប ។ល។ លុះដល់ថ្ងៃទី១៩ ខែសីហា ឆ្នាំ២០១១ ក៏ត្រូវបានមន្ត្រីសង្ឃខេត្តសៀមរាប ពេជ្រ សន ចេញលិខិតបណ្តេញ និងហាមគ្រប់បណ្តាវត្តទូទៅក្នុងទឹកដីអង្គរ ខេត្តសៀមរាប មិនឱ្យគង់នៅទៀត ។ រហូតមកដល់បច្ចុប្បន្ននេះ ព្រះតេជគុណ លួន សុវ៉ាត នៅពុំទាន់មានអារាមសម្រាប់គង់នៅអចិន្ត្រៃយ៍ឡើយទេ ។

**ការទទួលស្គាល់ថ្នាក់ជាតិ និងអន្តរជាតិ**

ភិក្ខុ លួន សុវ៉ាត ត្រូវបានអង្គការសង្គមស៊ីវិលជាតិ និងអន្តរជាតិទទួលស្គាល់ជាផ្លូវការ ថាជាអ្នកការពារសិទ្ធិមនុស្សដ៏ឆ្នើមមួយ ។ ដូច្នេះទើបព្រះអង្គត្រូវបានអន្តរជាតិ និងសហប្រជាជាតិតែងតែនិមន្តទៅក្រៅប្រទេសជាញឹកញាប់ ដូចជាកាលពីថ្ងៃទី ៣ ខែ ធ្នូ ឆ្នាំ២០១០ ត្រូវបាននិមន្តទៅកាន់បូរីញូយ៉កក្នុងឋានៈជាអ្នកការពារសិទ្ធិមនុស្ស ដើម្បីធ្វើបាថកថា ក្នុងវេទិកាសិទ្ធិមនុស្សដើម្បីផ្លាស់ប្តូរ (Fucos Forchange) ។ នៅថ្ងៃទី ១២ ខែ កញ្ញា ឆ្នាំ២០១១ អង្គការឃ្លាំមើលសិទ្ធិមនុស្សបានផ្តល់រង្វាន់ Hellman/ Hanmett ។ នៅថ្ងៃទី ២៣ កញ្ញា ឆ្នាំ២០១១ សហគមន៍ខ្មែរនៃប្រទេសអូស្ត្រាលីបាននិមន្តចូលរួមក្នុងពិធីកាន់ភ្ជុំបិណ្ឌ និងកឋិនទានតាមប្រពៃណី ។ លុះមកដល់ថ្ងៃទី២ ខែតុលា ឆ្នាំ២០១២ បានទទួលរង្វាន់អ្នកការពារសិទ្ធិមនុស្សអន្តរជាតិ (Nartin Ennals Award for Human Rights Defenders) នៅឯទីក្រុងហ្សឺណែវប្រទេសស្វីស ។និងចុងក្រោយកាលពីថ្ងៃទី៥ ខែមេសា ឆ្នាំ២០១៣ កន្លងមកនេះបានទទួលសញ្ញាប័ត្រលើកទឹកចិត្តពីសហគមន៍ខ្មែរនៃទីក្រុងហ្វីឡាដែលហ្វៀរដ្ឋផែនស៊ីវៀនៀ សហរដ្ឋអាមេរិក ៕

# ក្តួបូលិតណោសភាយការណ៍ពីបរិស្ថាននៅកម្ពុជា

(តពីលេខមុន)

ឬការខ្ចីពីភាគីណាមួយផ្សេងទៀត[៥៧] ។ ទោះបីជាបែបនេះក៏ដោយ ក្រុមហ៊ុនបានបន្តខ្ចីពីធនាគារផ្សេងទៀតបីនៅក្នុងប្រទេសកម្ពុជា[៥៨] ។ ឧទាហរណ៍ក្នុងខែ មិថុនា ឆ្នាំ ២០០១ សុខ កែវ ភរិយារបស់ ចាន់ សារុន បានខ្ចីពីធនាគារកម្ពុជាសាធារណៈជំនួសឱ្យក្រុមហ៊ុន Kingwood ដោយបញ្ចាំទីតាំងរោងចក្រ និងគ្រឿងម៉ាស៊ីន[៥៩] ។ កិច្ចព្រមព្រៀងបញ្ចាំ ត្រូវបានចុះហត្ថលេខា មិនត្រឹមតែដោយ សុខ កែវ និងអ្នកតំណាងរបស់ធនាគារកម្ពុជាសាធារណៈប៉ុណ្ណោះទេ ថែមទាំងដោយប្រធានសមាគមមេធាវីកម្ពុជា លោក គី តិច ទៀតផង[៦០] ។ ប្រភពមួយជិតស្និទ្ធនឹងក្រុមហ៊ុន Kingwood បញ្ជាក់ថា ធនាគារកម្ពុជាសាធារណៈ បានផ្តល់កម្ចីដល់ក្រុមហ៊ុនសរុបប្រមាណ US$៣លាន[៦១] ។


រោងចក្រកាត់បន្ទះរបស់ក្រុមហ៊ុន Kingwood ចម្ងាយ ២១ គីឡូម៉ែត្រ ភាគខាងជើងក្រុងភ្នំពេញ

## ប្រអប់ ៣ : គី តិច

ប្រធានសមាគមមេធាវីកម្ពុជា គី តិច ត្រូវបានរៀបរាប់ដោយប្រភពដ៏ល្អជាច្រើនថា ជាទីប្រឹក្សារបស់ ប៊ុន រ៉ានី ភរិយារបស់ ហ៊ុន សែន ហើយគាត់មានទំនាក់ទំនងយ៉ាងជិតស្និទ្ធជាមួយអ្នកធ្វើអាជីវកម្មឈើរបស់ប្រទេសកម្ពុជាដ៏មានអំណាចជាច្រើន[៨៨] ។ ក្នុងដើមឆ្នាំ ២០០១ គាត់បានតំណាងឱ្យសម្បទានិកឈើក្រុមហ៊ុន Everbright ក្នុងការចាត់វិធានការណ៍ច្បាប់មិនបានជោគជ័យប្រឆាំងបុគ្គលិកមកពី Global Witness ចំពោះការចូលតំបន់ហាមឃាត់ដែលបានចោទប្រកាន់ ។ នៅពេលនោះ Global Witness គឺជាអ្នកត្រួតពិនិត្យឯករាជ្យផ្លូវការរបស់រដ្ឋាភិបាលប្រឹងប្រែងដោះស្រាយបទល្មើសព្រៃឈើ ហើយការចូលតំបន់ហាមឃាត់ដែលបានចោទប្រកាន់ គឺជាការធ្វើអធិការកិច្ចផ្លូវការ ដែលរៀបចំឡើងដោយទីស្តីការគណៈរដ្ឋមន្ត្រីទៅលើរោងចក្រកាត់បន្ទះរបស់ក្រុមហ៊ុន Everbright ។ ក្នុងអំឡុងពេលអធិការកិច្ចនេះ Global Witness បានលាតត្រដាងភស្តុតាងពីការលួចសួយសារទ្រង់ទ្រាយធំដោយក្រុមហ៊ុន ។


អាគារប្រើប្រាស់ដោយតុលាការចម្រុះអង្គការសហប្រជាជាតិ - រដ្ឋាភិបាលបង្កើតឡើងដើម្បីកាត់ទោសអតីតមេដឹកនាំខ្មែរក្រហម ដែលទទួលខុសត្រូវចំពោះការស្លាប់ប្រជាជនខ្មែរ ប្រមាណពីរលាននាក់ក្នុងរវាង ឆ្នាំ ១៩៧៥ និង ១៩៧៩ ។ ប្រជាជនខ្មែរជាច្រើនកំពុងសង្ឃឹមថា តុលាការនេះ នឹងជួយបង្កើនបទដ្ឋានតុលាការយុត្តិធម៌របស់ប្រទេស ។

ដូចក្រុមហ៊ុន Kingwood ដែរ អ្នកម៉ៅការធំរបស់ក្រុមហ៊ុន Everbright រួមមាន សេង គាង និង ឃុន ថុង ។ ដូចបានរៀបរាប់នៅកន្លែងផ្សេងទៀតក្នុងជំពូកនេះ គី តិច បានតំណាងឱ្យ សេង គាង ក្នុងការដោះស្រាយជាមួយនាយករបស់ក្រុមហ៊ុន Kingwood និងតុលាការកម្ពុជា ។

គីតិច បានទាក់ទាញចំណាប់អារម្មណ៍ប្រព័ន្ធផ្សព្វផ្សាយនាពេលថ្មីៗនេះ ចំពោះការរិះគន់ជាសម្លេងរបស់គាត់លើសំណើអនុញ្ញាតឱ្យមេធាវីបរទេសធ្វើការនៅការកាត់ទោសអតីតមេដឹកនាំខ្មែរក្រហម[៨៩] ។ គាត់ក៏ត្រូវបានរាយការណ៍ថា បាននិយាយថា មេធាវីកម្ពុជា ដែលចូលរួមក្នុងការបណ្តុះបណ្តាលដែលរៀបចំឡើងដោយសមាគមមេធាវីអន្តរជាតិក្នុងការគាំទ្រដល់តុលាការកាត់ទោសខ្មែរក្រហម គឺជាការបំពានច្បាប់ប្រទេសកម្ពុជា[៩០] ។ Global Witness បានសរសេរលិខិតមួយទៅកាន់ គី តិច ក្នុងខែ កុម្ភៈ ឆ្នាំ ២០០៧ ដើម្បីសួរគាត់ថា តើសេចក្តីអធិប្បាយដែលបានរាយការណ៍ទាំងនេះ ជាការបង្ហាញត្រឹមត្រូវនូវអ្វី ដែលគាត់បាននិយាយមែនដែរ ឬទេ ហើយប្រសិនបើដូច្នេះ សូមឱ្យពន្យល់ពីអត្ថន័យរបស់ពួកគេ ។ គី តិច មិនបានឆ្លើយតបលិខិតនេះនៅឡើយទេ ។ បុគ្គលិកសិទ្ធិមនុស្សបានបង្ហាញពីការព្រួយបារម្ភថា គី តិច នឹងធ្វើការតាមសេចក្តីណែនាំពីមន្ត្រីជាន់ខ្ពស់ប្រទេសកម្ពុជា ដែលចង់ឃើញដំណើរការកាត់ទោសជាប់គាំង ឬរំសាយទាំងអស់គ្នាវិញ[៩១] ។

នៅចុងឆ្នាំ ២០០១ បញ្ជីឈ្មោះអ្នកផ្តល់ឥណទានមិនទាន់បានសងរបស់ក្រុមហ៊ុន Kingwood រួមមានមិនត្រឹមតែធនាគារប៉ុណ្ណោះទេ តែថែមទាំងអ្នកម៉ៅការរបស់ខ្លួនទៀតផង ។ នៅថ្ងៃទី ៣ ខែ តុលា ឆ្នាំ ២០០១ នាយកគ្រប់គ្រងក្រុមហ៊ុន Kingwood លោក Lia Chun Hua និង សេង គាង បានចុះហត្ថលេខាលើកិច្ចព្រមព្រៀងមួយ ដែលគ្រប់គ្រងលើការទិញឈើមូលកាលពីមុន និងនាពេលអនាគត ។ ឃុន ថុង បានចុះហត្ថលេខាអមលើឯកសារក្នុងឋានៈជាសាក្សី[៦២] ។ កិច្ចព្រមព្រៀងនេះបង្ហាញថា ក្រុមហ៊ុន Kingwood បានខ្ចី សេង គាង ជាង US$១.៥ លាន ដែល Lia Chun Hua បានសន្យាសងបណ្តាក់ US$១00,000 ក្នុងរយៈពេលជាង ២០ ខែ ។ Lia Chun Hua ក៏បានសន្យាបន្តទិញឈើមូលពី សេង គាង ផងដែរ ហើយបានប្រគល់សិទ្ធិឱ្យគាត់គ្រប់គ្រងជាបណ្តោះអាសន្នលើគ្រឿងម៉ាស៊ីនអាជីវកម្មចំនួន ៥៤មុខ ក្នុងរោងចក្រក្រុមហ៊ុន Kingwood ជាការធានា ។ ការគ្រប់គ្រងរបស់គាត់លើគ្រឿងម៉ាស៊ីនទាំងនេះ នឹងក្លាយជាអចិន្ត្រៃយ៍ក្នុងករណីដែលមានការបំពានលើកិច្ចសន្យាសងប្រាក់នេះ[៦៣] ។ គ្រឿងម៉ាស៊ីនដែលបានផ្ទេរឱ្យ សេង-គាង គឺដូចគ្នានឹងបរិក្ខារដែលបានបញ្ចាំឱ្យធនាគារកម្ពុជាសាធារណៈ ដោយ សុខ កែវ ។ មិនច្បាស់ថា តើធនាគារ ឬ សុខ កែវ បានដឹងពីកិច្ចព្រម-ព្រៀងរបស់ Lia Chun Hua ជាមួយ សេង គាង ដែរ ឬអត់នោះទេ ។


កិច្ចសន្យារវាង សេង គាង និង Lia Chun Hua ពាក់ព័ន្ធការផ្គត់ផ្គង់ឈើ និងបំណុលរបស់ Kingwood ខែ តុលា ឆ្នាំ ២០០១

ដោយស្ថិតក្រោមសម្ពាធពីអង្គការក្រៅរដ្ឋាភិបាល និងម្ចាស់ជំនួយអន្តរជាតិ ការរំពឹងទុករបស់ក្រុមហ៊ុន Kingwood ក្នុងការបន្តសងបំណុលរបស់ខ្លួន មិនត្រូវបានពង្រឹងឡើយនៅពេលដែលរដ្ឋាភិបាលកម្ពុជាបានកំណត់ការបញ្ឈប់មួយរយៈ ចំពោះការប្រមូលផលសម្បទានឈើ ដែលមានសុពលភាពចាប់ពីខែ មករា ឆ្នាំ ២០០២ ។ ការបញ្ឈប់មួយរយៈកើតឡើង បន្ទាប់ពីការខកខានរបស់សម្បទានិកក្នុងការបំពេញតាមកាលផុតកំណត់ដាក់ជូននូវផែនការគ្រប់គ្រងព្រៃឈើប្រកបដោយចីរភាព (SFMPs) និងការវាយតម្លៃផលប៉ះពាល់បរិស្ថាន និងសង្គម (ESIAs) ដែលបានកំណត់ឱ្យនៅចុងខែ វិច្ឆិកា ឆ្នាំ ២០០១ ។

ការបញ្ឈប់មួយរយៈចំពោះការកាប់ឈើ ត្រូវបានធ្វើឡើងបន្ទាប់ដោយការបញ្ឈប់មួយរយៈនូវការដឹកជញ្ជូនឈើមូល ដែលចូលជាធរមានក្នុងខែឧសភាឆ្នាំ២០០២ ។សម្បទានិកមួយចំនួនដែលគួរឱ្យកត់សំគាល់គឺក្រុមហ៊ុន GAT International និងក្រុមហ៊ុន Pheapimex ជាដំបូងបន្តកាប់ឈើ និងដឹកជញ្ជូនឈើបំពានលើការបញ្ឈប់មួយរយៈនេះ ។ ទោះយ៉ាងណាក៏ដោយ បន្ទាប់ពីការបង្ហាញរបស់ Global Witness ពីសកម្មភាពរបស់ក្រុមហ៊ុន GAT ហ៊ុន សែន បានលុបចោលសម្បទានចំនួនពីររបស់ក្រុមហ៊ុនក្នុង ខែ មិថុនា ឆ្នាំ ២០០២[៦៤] ។ ពីនេះតទៅប្រព័ន្ធសម្បទានឈើបានចូលទៅកាន់អសកម្មភាពស្ទើរតែទាំងស្រុង ។

### ២.៣ ការគ្រប់គ្រងដែលមានអវិភាពខ្លាំង

សម្រាប់ ឌី ចូច. សេង គាង និង ឃុន ថុង ក្រុមហ៊ុនសម្បទានដូចជាក្រុមហ៊ុន Kingwood បានផ្តល់ឱ្យនូវលក្ខណៈមានប្រយោជន៍ស្ថិតនៅពីក្រោយអ្វីដែលពួកគេអាចធ្វើការគ្រប់គ្រងលើការធ្វើអាជីវកម្មកាប់ឈើមួយផ្នែកធំនៅក្នុងប្រទេសកម្ពុជា ។ ទោះយ៉ាងណាក៏ដោយ ការបញ្ឈប់មួយរយៈនៅឆ្នាំ ២០០២ ទៅលើការប្រមូលផល និងការដឹកជញ្ជូន បានផ្លាស់ប្តូរចំណុចនេះទាំងស្រុង ។

ប្រភពមួយជិតស្និទ្ធនឹងប្រតិបត្តិការក្រុមហ៊ុន Kingwood បានជូនដំណឹងដល់ Global Witness ថា ក្នុងខែ សីហា ឆ្នាំ ២០០២ នាយកគ្រប់គ្រងរបស់ក្រុមហ៊ុន Kingwood លោក Lia Chun Hua បានព្យាយាមកាត់បន្ថយការខាតបង់ ដែលមានការកើនឡើងរបស់គាត់ និងចាកចេញពីកម្ពុជាជាធម្មតា ។ ដោយយោងតាមប្រភពនេះបានឱ្យដឹងថា គាត់ត្រូវបានទប់ស្កាត់ពីការធ្វើដូចនេះដោយ សេង គាង ដែលកូនចៅរបស់គាត់បានចាប់ជំរត់ Lia រឹបអូសលិខិតឆ្លងដែនរបស់គាត់ និងដាក់គាត់ជាចំណាប់ខ្មាំងក្នុងបរិវេណរោងចក្រ ។ Global Witness បានស៊ើបអង្កេតការបញ្ជាក់អះអាងទាំងនេះ ហើយបានប្រមូលព័ត៌មានពីប្រភពជាច្រើន ដែលចង្អុលបង្ហាញទៅលើតម្រូវការឱ្យមានការស៊ើបអង្កេតយុត្តិធម៌ ដែលអាចទុកចិត្តបានទៅលើជោគវាសនារបស់ Lia និងការកាន់កាប់នាពេលបច្ចុប្បន្នលើក្រុមហ៊ុន Kingwood ។ ព័ត៌មាននេះ ត្រូវបានសង្ខេបដូចខាងក្រោមនេះ :

i) ***ឯកសារពាក់ព័ន្ធការប្រគល់ឱ្យរបស់ Lia Chun Hua ចំពោះការគ្រប់គ្រងក្រុមហ៊ុន Kingwood***


កិច្ចសន្យាដែល Lia Chun Hua ទទួលស្គាល់បំណុលជិត US$ ៣.៥ លាន ចំពោះ សេង គាង និង ឃុន ថុង ថ្ងៃទី ១២ ខែ សីហា ឆ្នាំ ២០០២

តទៅលេខក្រោយ


## ពេទ្យធ្មេញសំរាប់គ្រួសារ Caring Dental For ALL Ages

Bright Smiles Dental 978 455-4039

COMPLETE ផ្តល់គ្រប់សេវាកម្ម Services

- Cosmetic Dentistry
- Cosmetic Fillings
- Crowns & Bridges
- Dentures
- Extractions
- Implant Crowns
- Root Canal Therapy

- ត្រួតពិនិត្យទៀតទាត់ពេល
- សំអាតធ្មេញ
- ដំដែកពាក់ធ្មេញ
- ដកសរសៃធ្មេញ
- ស្រោប-តម្រឹម និងប៉ះធ្មេញ
- ធ្វើធ្មេញឱ្យស
- បំពេញធ្មេញប្រហោង
- ដកធ្មេញ

Convenient LOCATION
Next to Bank of America on Chelmsford Street

Most Forms of Insurance & Payment
ACCEPTED ទទួលគ្រប់ អ៊ិនស៊ូរិន
MassHealth • Cigna • Aetna
Amex • Discover • Visa • Mastercard

FREE Teeth Whitening
New patients get a complimentary teeth whitening kit with completed exam, cleaning & x-rays at regular price. Cannot be combined with any other offers. Expires 30/04/2012

"EXCLUSIVE OFFER" $55.00
Limited Time New Patient Special
(Regular Discount $55.99 a $250 Value)
Present coupon for discount. Includes exam, bite-wing x-ray & cleaning. Cannot be combined with other offers or insurance. Expires 30/04/2012

យើងមានអ្នកនិយាយភាសាខ្មែរ អង់គ្លេស ស្ប៉ានីស និងវៀតណាម សូមទូរស័ព្ទ 978-455-4039 ដើម្បីណាត់ជួបនៅថ្ងៃនេះ

724 Chelmsford Street • Lowell, MA • 978-455-4039
www.BrightSmiles–Dental.com

អ្នកឧបត្ថម្ភ









# សុខភាព និងម្ហូបអាហារយើងបរិភោគ

## ទឹកត្រីជូរអែមបន្ថយជាតិសូឌីយ៉ូម (មិនសូវប្រៃ)

### គ្រឿងផ្សំ

- ខ្ទឹមស ២ កំពឹស
- ម្ទេសជើងចាប ២-៥ គ្រាប់
- ទឹកក្រូចឆ្មា ១/២ ពែង (ក្រូចឆ្មាធំល្មម ៤ ផ្លែ)
- ទឹក ៤ ស្លាបព្រា (១/៤ កែវ)
  ឬ ២ ស្លាបព្រាបន្ថែម
- ស្ករ ១/៤ ស្លាបព្រា
- ទឹកត្រី ១/៤ ស្លាបព្រា

រៀបចំប្រមាណ ១៦ ស្លាបព្រា
បរិមាណបរិភោគ : ១ ស្លាបព្រា

បន្ទាប់ពីលាយរួចហើយ ។ ទឹកត្រីជូរអែមនេះអាចញាំបានប្រហែលជាក្នុងរយៈពេលបី (៣) ថ្ងៃប៉ុណ្ណោះ ។

**ការរៀបចំ :**

ប្រើត្បាល់និងអង្រែបុកខ្ទឹមស, ម្ទេស និងស្ករ ។ រួចហើយចាក់ទឹកត្រី, ទឹកក្រូចឆ្មារ និងទឹកសុទ្ធ (បើសិនប្រើទឹក) លាយឲ្យចូលជាតិគ្នា ។ ទុកក្នុងទូទឹកកក

**កំណត់សំគាល់អាហារូបត្ថម្ភ**

- បន្ថយជាតិសូឌីយ៉ូម (ប្រើទឹកត្រីតិច ដោយប្រើទឹកក្រូចឆ្មា និង/ឬទឹកសុទ្ធជំនួសវិញ)

## ទឹកត្រីជ្រលក់បន្ថយជាតិសូឌីយ៉ូម (មិនសូវប្រៃ)

### គ្រឿងផ្សំ

- ទឹកសុទ្ធ ១/៤ ពែង
- ទឹកខ្មេះ ១ ពែង
- ស្ករ ១ ពែង
- ទឹកត្រី ១ ពែង
- ខ្ទឹមស ២ កំពឹសចិញ្ច្រាំឲ្យល្អិត
- ម្ទេសជើងចាប ៤-៥ គ្រាប់ហាន់ល្អិតៗ

រៀបចំប្រហែល ៤ ចាន ឬ កែវរង្វាល់

បរិភោគជាមួយ :

- មើមការ៉ុតឈូសដើម្បីតុបតែងលំអ
- សណ្តែកដីកិនល្អិតៗ ដើម្បីបង្កើនសម្រស់និងរសជាតិ

**កំណត់សំគាល់អាហារូបត្ថម្ភ**

- បន្ថយជាតិសូឌីយ៉ូម (ប្រើទឹកត្រីតិច ដោយប្រើទឹកសុទ្ធជំនួស)

**ការរៀបចំ :**

លាយស្ករ, ទឹកខ្មេះ និងទឹកសុទ្ធក្នុងចាន ។ ដាក់រំងាស់ទាល់តែស្កររលាយ ។ ពេលស្កររលាយហើយ លើកវាចេញភ្លាម ហើយចាក់ទឹកត្រីចូល ។ ពេលទឹកត្រីជ្រលក់ត្រជាក់ហើយ ដាក់ខ្ទឹមស និងម្ទេសចូល ។ ចាក់ចូលក្នុងកែវដែលមានគម្របបិទជិតហើយទុកក្នុងទូរទឹកកក ។ ទឹកត្រីជ្រលក់នេះអាចរក្សាទុកក្នុងទូរទឹកកក ក្នុងរយៈពេល ២-៣ ខែបាន ។

## Reduced Sodium Lime Sweet and Sour Fish Sauce

### Ingredients/Shopping list

2 cloves garlic
2-5 bird's eye chilies
½ cup of lime juice (about 4 medium limes)
4 tablespoons water (¼ cup) OR 2 tablespoons extra lime juice (about 1 lime)

¼ cup sugar
4 tablespoons fish sauce (¼ cup)

Makes 16 tablespoons
Serving size: 1 tablespoon

### Nutrition Notes

- Reduced sodium (less fish sauce, replaced with lime juice and/or water)

### Preparation

Smash the garlic, chilies, and sugar with a mortar and pestle. Mix in the fish sauce, lime juice and water (if using water). Refrigerate after mixing. This sauce is good for about 3 days.

## Reduced Sodium Sweet and Sour Fish Sauce

### Ingredients/Shopping list

1¼ cups water
1 cup distilled vinegar
1 cup sugar

1 cup fish sauce
2 cloves garlic, finely sliced
4-5 bird's eye chilies, sliced open

Makes 68 tablespoons
Serving size: 1 tablespoon

### Serve with

- Grated or very thin sticks of carrot for garnish
- Ground peanuts for garnish and flavor

### Nutrition Notes

- Reduced sodium (less fish sauce, replaced with water)

### Preparation

Mix the sugar, vinegar, and water in a saucepan. Heat over medium high heat just until the mixture boils and the sugar dissolves. Immediately remove from heat and add the fish sauce. Cool the mixture, then add garlic and bird's eye chilies. Store in the refrigerator in a sealed container. Keeps for 2-3 months refrigerated.

## ស៊ុបឆ្នាំងភ្លើងគ្រឿងសមុទ្រ

### គ្រឿងផ្សំ

- ផ្សិតក្រៀម ២ អោន្ស៍
- ទឹកសុទ្ធ ១.៥ ពែង
- ស្ករ ១/២ ស្លាបព្រា
- ប្រេងកាណូឡា ១/២ ស្លាបព្រា
- សាច់ចន្លកជ្រូក ៨ អោន្ស៍
- ប្រហិតសាច់ត្រី ៣.៥ អោន្ស៍
- ប្រហិតសាច់ជ្រូក ៦ ដុំ
- ទឹកស៊ុបមាន់មានជាតិសូឌីយ៉ូមតិច ២ ពែង
- មឹកស្រស់ ១/៤ ផោន
- បង្គាស្រស់ ១២ បង្គា
- ទឹក ៤-៦ ពែង
- ស្ពៃក្តោប ណាប៉ា ១/២ គុម្ព
- សាឡាត់ស ១ បាច់ធំ

រៀបចំសំរាប់មនុស្ស : ៦ នាក់
បរិមាណបរិភោគ : ស៊ុប ២ ពែង, បាយអង្ករសំរូប ១ ពែង

**ការរៀបចំ :**

ត្រាំផ្សិតក្រាមក្នុងទឹកក្តៅពេញមួយយប់ ។ លាងផ្សិតឲ្យបានស្អាត ហើយកាត់ដើមផ្សិតចេញ ។ ដាក់ផ្សិតស្ងោរ ។ ចាក់ស្ករ និងប្រេងចូល. រំងាស់ផ្សិតប្រហែល ២៥ នាទីទាល់តែទឹកស្ទើររីង ហើយកូរម្តងម្កាលផង ។

ខណៈផ្សិតកំពុងតែដាក់រំងាស់, ហាន់សាច់ជ្រូកសុទ្ធ និងស្ងោរវា ២ នាទី ដោយប្រើទឹកពីរពែង ។ ខណៈដែលទឹកឡើងពពុះ, ដួសពពុះនោះចេញ ។ ហាន់ប្រហិតត្រីជាកំណាត់ៗ បន្ទាប់មកហាន់បញ្ឆិតៗ ប្រវែងប្រហែលមួយ ១/៤ អ៊ិន្ឈ៍ ។ លាងប្រហិតសាច់ជ្រូកឲ្យស្អាត ។

នៅពេលសាច់ជ្រូកស្ងោរបាន ២០ នាទីហើយ ដាក់ប្រហិតត្រី, ផ្សិត, ប្រហិតសាច់ជ្រូក និងទឹកស៊ុបមាន់ចូល ។ រំងាស់ក្នុងរយៈពេល ២៥ នាទី, សូមកូរម្តងម្កាលផង ។

ខណៈទឹកស៊ុបកំពុងតែពុះ, ហាន់ព្រួយត្រីមឹក ហើយទុកមួយកន្លែងសិន បន្ទាប់មកអង្កន់ត្រីមឹកបញ្ឆិតៗ ហើយហាន់វាតូចៗ ប្រវែលប៉ុនមេដៃ ហើយដាក់វាជាមួយព្រួយរបស់វា ។ បកព្រោនហើយវះយកសរសៃចេញ បន្ទាប់មកដាក់វាជាមួយត្រីមឹក ។

លាងស្ពៃក្តោប ណាប៉ា ឲ្យស្អាត ហើយហាន់វាបញ្ឆិតៗ ។ លាងសាឡាត់សឲ្យស្អាត ហើយកាត់គល់វាចេញ ។

បន្ទាប់ពីស៊ុបបានរំងាស់ ៤៥ នាទីហើយ, ដាក់ព្រោន និងត្រីមឹកចូល, ចំអិន ៥ នាទីទៀត ហើយដាក់ស្ពៃក្តោបណាប៉ា និងសាឡាត់សចូល ។ ចំអនិ ២-៣ នាទីទៀតល្មមតែស្ពៃក្តោប ណាប៉ា និងសាឡាត់សទន់ល្មម, ប៉ុន្តែកុំចំអិនវាយូរពេក ។

បរិភោគជាមួយ: បាយអង្ករសំរូប ៦ ពែង

**កំណត់សំគាល់អាហារូបត្ថម្ភ**

- បន្ថយជាតិសូឌីយ៉ូម (ប្រើទឹកស៊ុបមាន់មានជាតិសូឌីយ៉ូមតិច ប្រើប្រហិតសាច់ជ្រូកតិចជាងចំនួនប្រើធម្មតា កុំប្រើស្បែកជ្រូក អំបិល និងម្សៅស៊ុប)
- បន្ថយកូឡេស្តេរោល (ប្រត្រីមឹក និងបង្គាតិច)
- បន្ថយជាតិខ្លាញ់ឆ្អែត និងជាតិកូលេស្តេរោល (ប្រើសាច់តិច ប្រើសាច់ចន្លកជំនួសសាច់ជ្រូកសំរាប់អាំង កុំប្រើស្បែកជ្រូក)
- បង្កើនជាតិសរសៃ និងបន្ថយជាតិកាបូអ៊ីដ្រាតធម្មតា (បរិភោគបាយអង្ករសំរូប ជំនួសបាយអង្ករសិត)
- គ្រឿងផ្សំនៅក្នុងមុខម្ហូបនេះដាក់អំបិលគ្រប់គ្រាន់ហើយ មិនត្រូវដាក់អំបិលបន្ថែមទៀតទេ ។.

## Seafood Hot Pot

### Ingredients/Shopping list

2 ounces dried mushrooms (½ of 4 ounce package)
1½ cups water
½ tablespoon sugar
½ tablespoon canola oil
8 ounces pork tenderloin, sliced thinly
3½ ounces fish cake (½ package)
6 pork balls (½ of 13 ounce package)
2 cups reduced sodium chicken broth

¼ pound small squid
12 large shrimp
4-6 cups water
½ head Napa cabbage, halved the long way (about 1¾ pounds)

Serves 6
Serving size: 2 cups soup, 1 cup cooked brown rice

### Preparation

Soak the mushrooms overnight in hot water. Rinse well and remove the stems. Cook in a medium pot with enough water to just cover the mushrooms, about 1½ cups. Add the sugar and oil. Simmer over medium high heat, stirring occasionally, about 25 minutes, until the water is almost all evaporated.

While the mushrooms are cooking, slice the pork tenderloin. Boil 20 minutes, in 2 cups water. As the water foams, remove the foam with a slotted spoon.

Slice the fish cake in half, then in diagonal slices, about ¼ inch wide. Rinse the pork balls.

When the pork tenderloin has boiled for 20 minutes, add the sliced fish cake, mushrooms, pork balls, chicken broth, and 4 to 6 cups water. Simmer for 45 minutes, stirring occasionally.

While the soup is boiling, slice off the tentacles of the squid and set aside, and then slice partly through the squid to make a diagonal pattern. Slice small 2 x 2½ inch sections off and place with the wavy tentacles. Take the shells and veins off of the shrimp. Place the shrimp with the squid.

Wash the cabbage well and slice diagonally into ½ inch slices.

After the soup has simmered for 45 minutes, add the shrimp and squid. Cook for 5 minutes more, and add the sliced cabbage. Cook for 2-3 minutes more, to soften the cabbage, but don't overcook the cabbage.

### Serve with

- 6 cups cooked brown rice

### Nutrition Notes

- Reduced sodium (reduced sodium chicken broth, fewer pork balls, no pork skin, no added salt, no MSG)
- Reduced cholesterol (less squid and shrimp)
- Reduced saturated fat and cholesterol (less meat, pork tenderloin instead of pork roast, no pork skin)
- Increased fiber/reduced simple carbohydrate (brown rice instead of white rice)
- The ingredients in this dish add enough salt that no extra salt should be added.

តនៅលេខក្រោយ

# កង់រទេះដែលឮសូរជាងគេ ទើបគេដាក់ខ្លាញ់គោឱ្យ!

**ទាំងអស់គ្នាហ៊ាននិយាយ ហ៊ានធ្វើ ទើបអាចទទួលបានការដោះស្រាយបញ្ហាសហគមន៍**

ដើម្បីអាចយើងទាមទារឱ្យសាលាក្រុងចាត់វិធានការណ៍លើសំណើររបស់សហគមន៍ ចាំបាច់យើងត្រូវយល់ដឹងជាមូលដ្ឋាននូវរចនាសម្ព័ន្ធចាត់តាំងនយោបាយ និងការប្រព្រឹត្តទៅនៃរដ្ឋាភិបាលក្រុងជាមុនសិន ។ រចនាសម្ព័ន្ធរដ្ឋាភិបាលក្រុងសហរដ្ឋអាមេរិកមានបីសណ្ឋានតាមការបែងចែកមុខងារទទួលខុសត្រូវរវាងចៅហ្វាយក្រុង (Mayor) ក្រុមប្រឹក្សា(City Council )និងអ្នកចាត់ការក្រុង(City Manager) ។ ការដឹកនាំតាមបែបទីមួយ គឺចៅហ្វាយក្រុង និងក្រុមប្រឹក្សាក្រុងបែងចែកការងារគ្នាដឹកនាំរដ្ឋាភិបាលក្រុង ។ ក្រុមប្រឹក្សាក្រុងជាអ្នកបង្កើតកម្មវិធីនយោបាយ(Policy) រីឯចៅហ្វាយក្រុងជាអ្នកអនុវត្តកម្មវិធីនយោបាយនោះ ។ រូបមន្តបែបនេះ តែងឃើញអនុវត្តនៅតាមបណ្តាក្រុងធំៗដែលមានពលរដ្ឋរស់នៅលើសពី២៥០,០០០ឡើង ដូចជាទីក្រុង New york ឬទីក្រុង Los Angeles ជាដើម ។ ចំណុចគួរឱ្យកត់សម្គាល់ គឺថា ទាំងចៅហ្វាយក្រុង និងសមាជិកក្រុមប្រឹក្សាក្រុងសុទ្ធតែជាមន្ត្រីនយោបាយដែលពលរដ្ឋបោះឆ្នោតឱ្យ ។ ពោលគឺរូបមន្តនេះ ពុំមានការបែងចែកឱ្យដាច់រវាងអំណាចបង្កើតច្បាប់ (Legislative Power)និងអំណាចអនុវត្តច្បាប់ (Executive Power)ឡើយ ។

ការដឹកនាំបែបទី២ គឺការបែងចែករវាងក្រុមប្រឹក្សាក្រុង (City Council)និងអ្នកចាត់ការក្រុង (City Manager) ។ ក្រុមប្រឹក្សាក្រុងជាអ្នកបង្កើតកម្មវិធីនយោបាយ ហើយអ្នកចាត់ការក្រុងអនុវត្តកម្មវិធីនយោបាយនោះ ។ រូបមន្តនេះមានឃើញអនុវត្តនៅតាមបណ្តាក្រុងដែលមានប្រជាពលរដ្ឋតិចជាង២៥០,០០០នាក់ ការដឹកនាំបែបនេះមានការបែងចែកដាច់រវាងអំណាចបង្កើតច្បាប់ និងអំណាចអនុវត្តច្បាប់ គឺក្រុមប្រឹក្សាក្រុងជាអ្នកបង្កើតច្បាប់ ឬកម្មវិធីនយោបាយ រីឯអ្នកចាត់ការក្រុងជាអ្នកអនុវត្តច្បាប់ ឬកម្មវិធីនយោបាយដែលអនុម័តដោយក្រុមប្រឹក្សាក្រុង ។

ការដឹកនាំបែបទី៣ គឺការដឹកនាំដោយស្នងការមួយក្រុម (Commision) ។ ស្នងការម្នាក់ៗត្រូវបានបោះឆ្នោតដោយប្រជាពលរដ្ឋរស់នៅក្នុងទីក្រុងនោះ ។ ស្នងការម្នាក់ៗក៏ដើរតួនាទីជាប្រធានស្ថាប័នជំនាញនានារបស់ក្រុងដែរ ។ រូបមន្តបែបនេះ ពុំសូវឃើញអនុវត្តច្រើនទេបច្ចុប្បន្ននេះ ។

ឡូវែលជាទីក្រុងតូចបើគិតតាមចំនួនប្រជាជនរស់នៅ ។ ការដឹកនាំរដ្ឋាភិបាលក្រុង គឺអនុវត្តតាមរូបមន្តទី២ គឺការបង្កើតកម្មវិធីនយោបាយ ឬច្បាប់ជាកាតព្វកិច្ចរបស់អ្នកចាត់ការក្រុង ។

ក្រុមប្រឹក្សាក្រុងឡូវែលមានសមាជិក៩នាក់ដែលបានទទួលការគាំទ្រពីប្រជាជនដោយការបោះឆ្នោតកន្លងទៅ ក្នុងនោះមានសមាជិកក្រុងម្នាក់ជាខ្មែរអាមេរិកាំង គឺលោក នួន វាសនា ។ សមាជិកក្រុមប្រឹក្សាក្រុងទាំង៩នាក់នេះ បានបោះឆ្នោតជ្រើសរើសសមាជិកម្នាក់ធ្វើការជាចៅហ្វាយក្រុង ។ លោក Patrick O.Murphy ត្រូវបានទទួលការគាំទ្រជាឯកច្ឆន្ទពីសមាជិកក្រុមប្រឹក្សាក្រុងគ្រប់គ្នាឱ្យធ្វើចាចៅហ្វាយក្រុងទទួលខុសត្រូវដោយផ្ទាល់ចំពោះម្ចាស់ឆ្នោត រីឯអ្នកចាត់ការក្រុងទទួលខុសត្រូវផ្ទាល់ចំពោះក្រុមប្រឹក្សាក្រុង និងចៅហ្វាយក្រុង ពីព្រោះក្រុមប្រឹក្សាក្រុងជាអ្នកជួលអ្នកចាត់ការក្រុងឱ្យមកបំរើការងារអនុវត្តច្បាប់ និងអនុវត្តកម្មវិធីនយោបាយរបស់សាលាក្រុង ។

នៅក្នុងប្រព័ន្ធដឹកនាំតាមរូបមន្តក្រុមប្រឹក្សាក្រុង-អ្នកចាត់ការក្រុង បើយើងចង់មានឥទ្ធិពលទៅលើកម្មវិធីនយោបាយ ឬច្បាប់ដែលផ្តល់ផលប្រយោជន៍ ឬដោះស្រាយបញ្ហាក្នុងសហគមន៍ យើងចាំបាច់សហការជិតស្និតជាមួយសមាជិកក្រុមប្រឹក្សាក្រុង និងចៅហ្វាយក្រុង ។ យើងអាចទាមទារឱ្យមន្ត្រីសាលាក្រុង ដូចជា អ្នកចាត់ការក្រុង ប្រធានអង្គភាពនានារបស់ក្រុង ក៏ដូចជាប្រធានគំរោងអភិវឌ្ឍន៍នានា ឱ្យទទួលខុសត្រូវចំពោះការអនុវត្តកម្មវិធីនយោបាយមិនត្រឹមត្រូវ ឬការរំលោភអំណាច រំលោភសិទ្ធិពលរដ្ឋ ការប្រកាន់ជាតិសាសន៍គ្រប់រូបភាព ភាពអយុត្តិធម៌សង្គមគ្រប់ប្រភេទ និងការបំពានក្រមសីលធម៌វិជ្ជាជីវៈនៃអង្គភាពគ្រប់លំដាប់ថ្នាក់ជាដើម ។ ការទាមទារនេះអាចធ្វើបានដោយយើងទាមទារសុំជួបជាមួយសមាជិកក្រុមប្រឹក្សាក្រុងដើម្បីជំរាបជូនអំពីបញ្ហាណាមួយដែលប្រឈមចំពោះសហគមន៍យើង ។ យើងអាចផ្តល់ដំណឹងនូវការបារម្ភនានាតាមរយៈគេហទំព័រ(Website)របស់សាលាក្រុង ឬយើងអាចសរសេរលិខិតរៀបចំការបារម្ភរបស់សហគមន៍ជូនដល់សមាជិកក្រុមប្រឹក្សាក្រុង ឬធ្វើញត្តិប្តឹងតវ៉ារួមមួយជូនទៅចៅហ្វាយក្រុង ឬក្រុមប្រឹក្សាក្រុង ។ បើការទាមទារមិនបានទទួលការឆ្លើយតប ឬបញ្ហារបស់យើងមិនបានដោះស្រាយសមរម្យទេ យើងអាចធ្វើបាតុកម្មនៅមុខសាលាក្រុង ដើម្បីទាមទារឱ្យសមត្ថកិច្ចក្រុងដោះស្រាយបញ្ហាទាំងនោះតាមសំណូមពររបស់យើងបាន ។

ជាទីបញ្ចប់ សូមរំលឹកនូវការអំពាវនាវរបស់ក្រុមប្រឹក្សាក្រុង លោក នួន វាសនា មួយឃ្លាថា "សហគមន៍យើងរឹងមាំបាន លុះត្រាតែយើងរួបរួមគ្នាជាធ្លុងមួយ" ពាក្យទូន្មានខ្មែរមួយឃ្លាថា "ចង្កឹះមួយបាច់គេកាច់មិនបាក់ បើយើងតែម្នាក់គេកាច់បាក់បាន"

ព័តិមានសំរាប់ទាក់ទងសមាជិកក្រុមប្រឹក្សាគឺតាមរយ: www.lowellma.gov/govt

# The Squeaky Wheel Gets the Grease!


គង់ សេងលី

In order to make our voice heard, our needs cared for, and our demands acted on by the City government, we need to understand some basic structure of the political organization of a city concerned. According to scholars in public administration, American cities are organized in three forms: a Mayor-Council form, Council-Manager, and a Com mission form. A choice of any particular form depends traditionally on the population size of a city. A large city of 250,000 or more people generally adopts a Mayor -Council system such as New York City or Los Angeles. A city of smaller size could adopts either of the two remaining forms, Council-Manager or Commission.

Lowell is a small size city. The Lowell City government is evidently organized in the form of Council-Manager form; the city council makes policies, or adopts programs and appropriate money for the policies or programs. A city manager, on the other hand, carries out those policies or programs as the council intends.

The Lowell city council is made up of nine councilors who are elected every two years by the city residents. In the last election, Mr. Vesna Nuon, a Cambodian American, iselected councilor. The nine councilors elect in turn one of their colleagues to be a mayor, Mr. Patrick O. Murphy. Under the council -manager system councilors are directly accountable to the voters while the city manager is accountable to the city council.

Under a council-manager system, if we want to gain agenda status of problems of strategic important to our community or to influence policies or programs so that they benefit or address the needs of our community, we need to work closely with our city councilors as well as the Mayor. In addition, we need to hold city officials ranging from city manager to departments' heads to programs mangers etc accountable for any mis management of the programs or policies, abuses of power, discrimination of any forms, social injustice of any kinds, and misconduct of public offices.

To press for accountability, transparency, and demand for remedy of a situation that affects or potentially affects our community, we can request individually as representative of a group or collectively to meet with councilors and make our voice heard on any issues of grave concern; we can post our concerns to the city councilors on the city website; we can write letters to the councilors; we can sign joint petitions; or we can organize public demonstrations in case that our problems are ignored or our concerns are not meaningfully addressed or our demands are not acted on effectively. Remember, "We ar e stronger together," reminded councilor Vesna Nuon!

Contact information for city councilors can be found at:

http://www.lowellma.gov/govt

សុខភាពល្អប្រសើរក្នុងដៃលោកអ្នក
បើលោកអ្នកមានជំងឺ ឈឺហើមជើងដៃពិបាកធ្វើចលនា -ឈឺនោមច្រើន -ដេកស្រមុំកខ្លាំង -មានស្ករច្រើនក្នុងឈាម -ឡើងទម្ងន់ធាត់ -ស្បែកឡើងកន្ទួល លោកអ្នកត្រូវចាំថា មានឱសថសក្តិសិទ្ធមានលក្ខណៈជាប្រភេទចំណី អាចជួយឱ្យសះស្បើយបានយ៉ាងឆាប់រហ័ស ។ ឱសថធម្មជាតិ ជាប្រេងចម្រាញ់ចេញពីពន្លកគ្រាប់ស្រូវមានការត្រួតពិនិត្យដោយវេជ្ជបណ្ឌិតត្រឹមត្រូវ អាចប្រើដោយមិនប្រឆាំងនឹងថ្នាំពេទ្យ ដែលប្រើប្រាស់រាល់ថ្ងៃទេ ។
លោក វិចិត្រ ភូស៊ុវុឌ ៦២ឆ្នាំ មុនប្រើ"អេមស្កា" គាត់ឈឺទឹក នោមផ្អែម ឈឺបេះដូង លើសឈាម -"អាលើជី"-ឈឺសន្លាក់ ដៃជើង ឈឺក្រពះ...។ល។
បន្ទាប់ពីបានប្រើ"អេមស្កា"
លេប៩គ្រាប់ក្នុង១ថ្ងៃ-បីថ្ងៃក្រោយមក អន់ឈឺសន្លាក់ដៃជើង -១ខែក្រោយអាចរត់ឡើងជណ្តើរបាន-បីខែក្រោយទៀតសរសៃឈាម២លែងស្ទះ-ឥឡូវនេះអាចរត់បាន១០គីឡូម៉ែត្រ-ធ្វើតេស្តឈាមមានភាពហ្វឹងធំល្អឡើងវិញ។
ចង់ដឹងបន្ថែមលេខទូរស័ព្ទលេខ
-ហ្វីឡាខាងត្បូង ២១៥ ២៣៧ ៩៧០៩ សាមន់ថា
-ហ្វីឡាខាងជើង ២១៥ ៦៦៧ ៨៤៣១ រ៉េវ

តមកពីទំព័រទី ១

# រឿងរ៉ាវ និងដើមកំណើតចូលឆ្នាំចិន

ក្រុមលោតម៉ុងសាយកំពុងសម្តែងមុខហាង

បុណ្យនិទាឃរដូវ ។ ព្រោះវាចំពេលដែលផ្កាទាំងឡាយចាប់ផ្តើមផ្កា ហើយរីកស្គុះស្គាយ ។ មិនតែប៉ុណ្ណោះពិធីនេះ ក៏ជាពិធីពិសេសមួយដែលគេប្រារព្ធធ្វើឡើង ដើម្បីឱ្យគ្រួសារទាំងឡាយ និងមិត្តភ័ក្តិទាំងអស់មកជួបជុំគ្នារួមក្តីសប្បាយ និងជាការនិយាយពាក្យរួមគ្នាថា លាហើយឆ្នាំចាស់ ស្វាគមន៍ឆ្នាំថ្មី។ ពិធីបុណ្យចូលឆ្នាំថ្មីរបស់ចិនក្នុងឆ្នាំម្សាញ់ឆ្នាំ២០១៣នេះ ប្រព្រឹត្តទៅក្នុងថ្ងៃទី១០ដល់១២ខែកុម្ភៈ ។

តាមធម្មតាបើតាមប្រពៃណីដើមមកពិធីបុណ្យចូលឆ្នាំថ្មីនេះគេប្រារព្ធធ្វើឡើងចំនួន៤សប្តាហ៍ ប៉ុន្តែមកដល់បច្ចុប្បន្ននេះពិធីនេះត្រូវបានគេធ្វើឡើងតែពី៣-៥ថ្ងៃប៉ុណ្ណោះ ។

ចំពោះរឿងរ៉ាវទាក់ទិននឹងដើមកំណើតនៃការប្រារព្ធពិធីបុណ្យចូលឆ្នាំថ្មីនេះ មានមនុស្សតិចតួចណាស់ដែលនៅដឹងរឿងរ៉ាវ ហើយចេះវិធីគន់គូររកប្រតិទិនសម្រាប់ថ្ងៃបុណ្យចូលឆ្នាំថ្មីនេះតាមលក្ខណៈបែបបុរាណគឺតាមចន្ទគតិធ្វើចលនាជុំវិញផែនដី ។ ព្រោះថ្ងៃប្រារព្ធធ្វើពិធីចូលឆ្នាំថ្មីនេះមិនដូចគ្នានោះទេ ។

ទាក់ទងទៅនឹងពិធីបុណ្យចូលឆ្នាំចិននេះ យើងជួបសម្ភាសន៍ជាមួយ លោក ហុក ប៊ូ នាយកអនុវិទ្យាល័យហ៊ុនសែន ហេងតុង ក្រុងតាខ្មៅ ដែលមានសំនួរចំលើយដូចខាងក្រោម :

**សំនួរ: ដើម្បីឱ្យប្រិយមិត្តអ្នកអានបានយល់កាន់តែច្បាស់ ខ្ញុំសូមអនុញ្ញាតលោកគ្រូជួយបកស្រាយបន្តិចថា តើបច្ចុប្បន្ននេះវត្តមានជនជាតិចិនចំនួនប៉ុន្មាននាក់នៅលើទឹកដីខ្មែរ? ហើយថាតើមានប៉ុន្មានអំបូរដែរ?**

-បាទជំរាបសួរ! មុននឹងឆ្លើយសំនួរនេះខ្ញុំសូមបញ្ជាក់ថា ជនជាតិចិនមានវត្តមាននៅលើទឹកដីខ្មែរតាំងពីសម័យសង្គមរាស្ត្រនិយមមកម្លេះ ហើយនៅក្នុងសម័យប៉ុលពត ជនជាតិចិនមួយចំនួនត្រូវបានគេសម្លាប់ដូចជនជាតិខ្មែរដែរ ។ ដូច្នេះហើយទើបជនជាតិចិនខ្លះបានភៀសសឹកទៅរស់នៅប្រទេសផ្សេងអស់មួយចំនួនទៅហើយ ។ បច្ចុប្បន្នជនជាតិចិននៅកម្ពុជានេះមានចំនួនប្រហែល៤០ម៉ឺននាក់ប៉ុណ្ណោះ ។ ជនជាតិចិនទាំងនោះគេមានអំបូរសរុបទាំងអស់ចំនួន៥៦ប្រភេទ ដែលជាជនជាតិភាគតិចរស់នៅលើទឹកដីចិនសព្វថ្ងៃ ។ ប៉ុន្តែសម្រាប់នៅលើទឹកដីខ្មែរមានអំបូរតែ២ប៉ុណ្ណោះ ក្នុងនោះមានចិន តាជៀវ និងចិន កុកងឺ ហើយភាសាដែលប្រើផ្លូវការ គឺចិនកុកងឺទោះបីចិនតែវ៉ាន់ក៏គេប្រើភាសាចិនកុកងឺដែរ ។

**●តើនៅក្នុងពិធីបុណ្យចូលឆ្នាំថ្មីប្រពៃណីចិនជនជាតិចិនដែលមានអំបូរផ្សេងៗគ្នានោះ គេប្រារព្ធពិធីដូចគ្នាឬខុសគ្នា ?**

-ជនជាតិចិនទោះបីជាមានអំបូរផ្សេងគ្នា ក៏ពិតមែន ក៏ប៉ុន្តែសម្រាប់ការប្រារព្ធពិធីបុណ្យចូលឆ្នាំថ្មីនេះគេធ្វើឡើងដូចៗគ្នា ពោលគឺមានពិធីតមមិនឱ្យដើរ ហើយផ្ទះខ្លះដែលគេមានធូរធារគេតែងហៅក្រុមម៉ុងសាយទៅលោតមុខផ្ទះគេជារឿងធម្មតា ។ លើកលែងតែពិធីសែនផ្លូវប៉ុណ្ណោះនៅមានការខុសប្លែកគ្នា ។ ប៉ុន្តែខុសប្លែកគ្នាបន្តិចបន្តួចប៉ុណ្ណោះ ។

**●ឆ្នាំនេះជាឆ្នាំម្សាញ់តំណាងដោយសត្វពស់ ហើយឆ្នាំមុនជាឆ្នាំរោងតំណាងដោយនាគរាជ តើពិធីចូលឆ្នាំខុសគ្នាដែរ ឬយ៉ាងណា ?**

-មិនខុសពីជំនឿចូលឆ្នាំថ្មីប្រពៃណីជនជាតិខ្មែរទេ សត្វពស់តំណាងឱ្យឆ្នាំម្សាញ់ចំណែកឆ្នាំរោងតំណាងដោយសត្វនាគ ។ សត្វនាគមាននៅក្នុងឆ្នាំរោងក្នុងចំណោមឆ្នាំទាំង១២ ប៉ុន្តែសត្វនាគត្រូវគេចាត់ទុកថា ជាសត្វដែលមានអំណាចលើសសត្វដទៃ ហើយសត្វនាគជាសត្វដែលគេជឿថាអាចមានឫទ្ធិការពារប្រទេសជួយនាំទឹកគ្រប់គ្រាន់សម្រាប់ប្រជាជនធ្វើស្រែចំការប្រកបរបរកសិកម្ម ។

**●ពិធីបុណ្យចូលឆ្នាំខ្មែរគេតែងប្រារព្ធឡើងនៅខែមេសា ប៉ុន្តែពិធីបុណ្យចូលឆ្នាំចិនវិញ ហេតុអ្វីឆ្នាំខ្លះធ្វើនៅចុងខែមករា ហើយឆ្នាំខ្លះ ធ្វើនៅដើមខែកុម្ភៈទៅវិញ ?**

-មិនមានអ្វីខុសប្លែកទេ ពិធីបុណ្យចូលឆ្នាំខ្មែរគេតែងធ្វើនៅថ្ងៃ១កើតខែផល្គុន ហើយយ៉ាងណាមិញពិធីបុណ្យចូលឆ្នាំចិនក៏ធ្វើឡើងដូចគ្នាដែរ គឺនៅថ្ងៃមួយកើតដើមខែមួយដែលគេហៅថា ខែជាហ្គួចនោះ ។ ប៉ុន្តែបានជាឆ្នាំ ខ្លះចំខែមករា ឆ្នាំខ្លះចំខែកុម្ភៈដោយសារតែខែនោះវារំកិលខុសគ្នាទៅតាមថ្ងៃបន្តិចបន្តួចប៉ុណ្ណោះ ។

**●ពេលចូលឆ្នាំចិន ហេតុអ្វីផ្ទះនីមួយៗគេតាំងលំអរូបភាពផ្សេងៗសុទ្ធតែពណ៌ក្រហមឱ្យអាំងប៉ាវក៏ពណ៌ក្រហមដុតគោមបំភ្លឺមុខផ្ទះក៏ពណ៌ក្រហម ចុះហេតុអ្វីបានជាចិនចូលចិត្តពណ៌ក្រហមម្ល៉េះ ?**

-នេះមិនមែនជនជាតិចិនចូលចិត្តពណ៌ក្រហមទេ ។ តាមជំនឿរបស់ជនជាតិចិន កាលដើមឡើយមានសត្វប្រភេទម្យ៉ាងដែលគេចំណាំហៅថា សត្វនីដល់រដូវច្រូតកាត់សត្វនោះតែងមកអុកឡុកភាតត្បាតធ្វើបាបអ្នកស្រុកលួចស៊ីស្រូវរបស់អ្នកស្រុក ។ នៅពេលនោះគេបានយកក្រណាត់ក្រហមដុតភ្លើងឱ្យឆេះឡើង ព្រមទាំងទូងស្គរដើម្បីបង្អើលសត្វនោះ ហើយដោយជំនឿជឿថា សត្វចង្រៃប្រភេទម្យ៉ាងនោះ ខ្លាចពណ៌ក្រហមខ្លាចសំឡេងបង្អើលក៏គេនាំគ្នាអុចផាវនាំគ្នាបិទក្រដាសតាមផ្ទះធ្វើអាំងប៉ាវពណ៌ក្រហមនេះឡើងដោយយល់ថា អាចបណ្តេញគ្រោះចង្រៃចេញពីផ្ទះ ហើយនាំសុខសប្បាយឱ្យឆ្នាំថ្មីរកស៊ីមានបាន ។ ការឱ្យអាំងប៉ាវក្រហមទៅក្មេងៗ គឺដើម្បីឱ្យក្មេងឆ្លាតក្មេងឆាប់ធំធាត់រៀនបានពូកែតែប៉ុណ្ណោះ ។

**●តើប្រពៃណីលោតម៉ុងសាយនៅពេលបុណ្យចូលឆ្នាំនោះតំណាងឱ្យអ្វីដែរ?**

គ្រឿងរណ្តាប់សែនចូលឆ្នាំចិន

ស្រោមអាំងប៉ាវដាក់លក់ក្នុងហាង

ត្រៀមអាំងប៉ាវជូនសាច់ញាតិ

ដុតគោមក្នុងបុណ្យចូលឆ្នាំថ្មី

-ម៉ុងសាយតំណាងឱ្យរូបសត្វតោ ។ សត្វតោត្រូវបានគេចាត់ទុកថា ជាស្តេចសត្វមានឫទ្ធិអំណាចខ្លាំងក្លាលើសសត្វដទៃ ដូច្នេះហើយនៅពេលបុណ្យចូលឆ្នាំជនជាតិចិន ពិសេសអ្នកមានធូរធារអាជីវករ និងនៅតាមក្រុមហ៊ុនមួយចំនួន គេតែងហៅម៉ុងសាយទៅលោតនៅផ្ទះបណ្តេញគ្រោះចង្រៃចេញពីផ្ទះនាំលាភចូលផ្ទះកូនចៅសម្បូរសប្បាយរកស៊ីមានបាននៅក្នុងឆ្នាំថ្មីខាងមុខនេះ ។

**●ប្រពៃណីជនជាតិចិន គេតែងអុចផាវ ដើម្បីបង្អើលបណ្តេញសត្វចង្រៃ ចុះបើចូលឆ្នាំចិននៅប្រទេសកម្ពុជាអាជ្ញាធរហាមមិនឱ្យដុតផាវ តើលោកយល់យ៉ាងណា ?**

-ខ្ញុំគាំទ្រចំពោះការហាមដុតផាវ ព្រោះថា ការដុតផាវក៏អាចបង្កឱ្យមានអំពើអសន្តិសុខក្នុងសង្គម ជាពិសេសជនខិលខូចមួយចំនួនលួចបន្លំធ្វើសកម្មភាពផ្សេងៗបាននៅពេលអុជផាវនេះផងដែរ ។ សម្រាប់ជនជាតិវៀតណាម ទោះបីប្រទេសគេទាំងមូលប្រារព្ធពិធីបុណ្យចូលឆ្នាំ ក៏គេហាមឃាត់មិនឱ្យដុតផាវដែរ ព្រោះថាអំពើអសន្តិសុខកើតឡើងភាគច្រើននៅពេលចូលឆ្នាំដោយសារការអុជផាវនេះតែម្តង ។ ពិធីបុណ្យចូលឆ្នាំចិនធ្វើឡើងស្របគ្នាជាមួយបុណ្យចូលឆ្នាំវៀតណាមបុណ្យចូលឆ្នាំជប៉ុនកូរ៉េផងដែរ ។

តទៅទំព័រទី ១២



ហាងមាសរស្មី

SUNSHINE JEWELRY, INC.

215-271-2950



Certified Diamonds & Golds (24K & 18K)
Men & Women Jewelries & Watches
Custom Design & Repairs on Premise
15 Years in Services & Growing Strong





702 Washington Ave. Phila., PA 19147
www.sunshinejewelryonline.com



Phở Hà Saigon

Vietnamese Restaurant

7 days A Week
9am-9pm








ជាហាងដែលធ្វើ ហ្វើ ឆ្ងាញ់ជាងគេនៅហ្វីឡា-
ដែលហៀចុងភៅដែលពូកែធ្វើ ហ្វើ និងម្ហូបផ្សេងៗ
ឯទៀត ត្រូវមាត់ភ្ញៀវគ្រប់ៗរូប ឥឡូវនេះមកធ្វើ
ម្ហូបនៅហាង Phở Hà Saigon
យើងខ្ញុំ ហើយធានាថា ម្ហូបអាហារហាង
និងបំរើលោកអ្នកបានយ៉ាងពេញចិត្តគ្រប់ពេលវេលា




320 W. Oregon Avenue, Suite 1. Philadelphia, PA 19147
Tel: (215) 389-1002 (Inside Oregon Market)



Mekong River

VIETNAMESE RESTAURANT

1120-1124S Front St.,
Philadelphia, PA 19147
(Near Washington Ave. - មានកន្លែងចតឡានត្រឹមត្រូវ

215-467-6100

GRAND OPENING

25-5-2012

មានម្ហូបវៀតណាមគ្រប់មុខ

ហ្វើ មី គុយទាវ នំបញ្ចុក ចាញ់ហាយ

បាយ ម្ហូបបួស ម្ហូបឆា ម្ហូប សម្រាប់ទទួលជាលក្ខណៈគ្រួសារ

ទទួលពិធីជប់លៀងជាលក្ខណៈគ្រួសារ ឬជួបជុំមិត្តភ័ក្រ

B Y O B






មានភោជនីយដ្ឋានទើបបើកនៅក្នុងសហគមន៍យើង

# តមកពីទំព័រទី ១០ រឿងរ៉ាវ និងដើមកំណើតចូលឆ្នាំចិន

**•រឿងរ៉ាវទាក់ទងទៅនឹងប្រវត្តិចូលឆ្នាំចិន :**

តាមដំណើររឿងព្រេងដែលបានចារទុកជាប្រវត្តិ និងជារឿងរ៉ាវដើមកំណើតនៃការប្រារព្ធពិធីបុណ្យចូលឆ្នាំមានការពន្យល់ និងយល់ឃើញផ្សេងៗពីគ្នា ។ បើតាមការកត់ត្រានៅក្នុងសៀវភៅរឿងព្រេងមួយបានប្រាប់ថា កាលពីមុនគេហៅពិធីនេះថា Nian ដែលមានន័យឆ្នាំចិន គឺពីដើមឡើយមានសត្វចម្លែកមួយរស់នៅក្នុងរូងភ្នំ ពេលវាចេញមកម្តងៗ គឺវាតែងតែបញ្ចេញនូវសំឡេងស្រែកគ្រហឹមយ៉ាងខ្លាំងដែលគួរឱ្យភ័យខ្លាច ហើយមានពន្លឺភ្លឺចិញ្ចាចពណ៌ក្រហមឆ្អិនឆ្អៅដូចជាដុំភ្លើង ។ ឱ្យតែយប់មុនចូលឆ្នាំថ្មីមួយថ្ងៃសត្វចម្លែកនេះតែងតែចេញមកសម្លាប់មនុស្ស និងសត្វពាហនៈនានា ។ ដូច្នេះហើយឱ្យតែចុងឆ្នាំចាស់ប្រជាជនក្នុងភូមិតែងតែប្រារព្ធពិធីបួងសួងសុំសេចក្តីសុខ ។ ហើយនៅក្នុងការបួងសួងនោះសត្វចម្លែកនោះក៏លេចមុខចេញមកដូចរាល់តែឆ្នាំ ។ ទើបនៅពេលនោះមានបុរសចំណាស់ម្នាក់ដែលជាអ្នកភូមិនោះដែរ មានសេចក្តីក្លាហានបានស្ម័គ្រចិត្តឱ្យសត្វចម្លែកនោះស៊ីគាត់ជំនួសការចាប់មនុស្សនៅក្នុងភូមិស៊ីជាអាហារតែត្រូវមានលក្ខខណ្ឌហើយគាត់បានប្រាប់ដល់សត្វចម្លែកនោះថា អ្នកឯងគួរតែស៊ីមនុស្ស ឬសត្វណាដែលភ័យខ្លាចចំពោះអ្នកឯងបានហើយ តែបើគេក្លាហានមិនគួរស៊ីទេ ព្រោះតែអ្នកឯងគ្មានអ្វីគួរឱ្យខ្លាចសម្រាប់គេ ។ សត្វចម្លែកមួយនោះក៏យល់ព្រមតាមសំណូមពររបស់គាត់ ហើយប្រជាជនពេញមួយភូមិក៏នាំគ្នាស្រែកឡើងធ្វើឱ្យលាន់ឮពេញតែក្នុងព្រៃ ។ ឃើញដូច្នេះសត្វចម្លែកនោះ ក៏រត់ទៅក្នុងព្រៃ ហើយបុរសម្នាក់នោះក៏រត់ទៅតាមក្រោយសត្វចម្លែកនោះ ។ មិនយូរប៉ុន្មានបុរសនោះក៏ត្រឡប់មកវិញ ទើបអ្នកភូមិចាត់ទុកគាត់ ដូចជាព្រះដែលមានជីវិតអមតៈហ៊ានតទល់នឹងសត្វចម្លែកនេះ។ ប្រជាជនក្នុងភូមិទាំងមូលមានចិត្តសប្បាយរីករាយណាស់ ដែលមានជីវិតរួចផុតពីទុក្ខទាំងឡាយ ។ ពួកគេនៅចាំបានថា មុនពេលដែលបុរសម្នាក់នោះចេញមុខតទល់ និងតាមសត្វចម្លែកគាត់បានផ្តាំប្រជាជនក្នុងភូមិថា ឱ្យតុបតែងគ្រឿងផ្សេងៗដែលមានក្រដាសពណ៌ក្រហមនៅតាមបង្អួចទ្វារផ្ទះ និងរបងជារៀងរាល់ឆ្នាំថ្មី ពីព្រោះសត្វលោកទាំងឡាយតែងតែខ្លាចពណ៌ក្រហម ។ ហើយគេតែងតែដុតផាវដើម្បីបន្លាចសត្វចម្លែកនានា ។ នេះគឺជាគំនិតមួយដែលគេគិតថា ជាចំណុចផ្តើមនៃការប្រារព្ធពិធីបុណ្យចូលឆ្នាំថ្មី ។ ប្រវត្តិចូលឆ្នាំចិននេះនៅមានរឿងរ៉ាវនិទានផ្សេងៗទៀត ។ មានប្រជាជនភាគច្រើនណាស់ដែលគេប្រារព្ធពិធីនេះតៗគ្នាដោយមិនដឹងពីមូលហេតុ និងដើមកំណើតឡើយ ។


ក្រុមលោតម៉ុងសាយនាំគ្នាសប្បាយ រីករាយក្នុងពិធីបុណ្យចូលឆ្នាំចិន

ចំពោះការចូលឆ្នាំចិន គឺជាថ្ងៃមួយនៃខែទីមួយនៃប្រតិទិនរបស់ចិន ។ ហើយឆ្នាំនីមួយៗគឺវាមានការធ្លាក់ថ្ងៃ ដែលភាគច្រើនវានៅចន្លោះពីថ្ងៃទី២១ ខែមករា ដល់ថ្ងៃទី១៩ កុម្ភៈ និងឈ្មោះឆ្នាំគឺមាន១២ឆ្នាំ ដែលមានប្រភេទសត្វខុសៗគ្នានៃឆ្នាំនីមួយៗដូចជាខ្មែរយើងដែរ។

**•កិច្ចការដែលត្រូវរៀបចំមុនឆ្នាំថ្មី ចូលមកដល់ :**

-ត្រូវរៀបចំបោសសម្អាតកន្លែងធ្វើការ និងផ្ទះសម្បែងឱ្យស្អាតមុនពេលចូលឆ្នាំថ្មីមួយអាទិត្យ ។ ហើយដាក់ក្រដាសថ្មី ឬអ្វីថ្មីដែលសរសេរពាក្យស្វាគមន៍ឆ្នាំថ្មី ហើយអ្វីដែលជារឿងរ៉ាវមិនល្អឆ្នាំចាស់ត្រូវជម្រុះចោល ហើយរីករាយស្វាគមន៍ឆ្នាំថ្មី ដើម្បីឱ្យកន្លែងធ្វើការ និងផ្ទះសម្បែងកាន់តែស្អាតបាតសំណាងល្អ និងសិរីសួស្តីក៏ចូលមកដែរ ។

-ដាក់កន្ត្រៃ និងកាំបិតឱ្យឆ្ងាយ ព្រោះវាជាមូលហេតុដែលនាំឱ្យកាត់អីដែលជាលាភថ្មីដែលនឹងចូលមក ។

-តុបតែងផ្ទះ និងផ្កាដែលស្រស់ស្អាត និងដើមឈើតូចៗ ដែលសម្រាប់ទទួលពិធីបុណ្យចូលឆ្នាំថ្មី ។ ដើមឈើ និងផ្កាស្រស់ស្អាតជាចំណុចពិសេសនាំមកនូវសំណាងល្អ ។

-ព្យួរនៅភាពពិសេសៗ ដែលគេហៅថា Nian Hua មានន័យនាំមកនូវការនិយាយពាក្យថា "សំណាងល្អ" ។

-ព្យួរក្រដាសនៅលើជញ្ជាំងដែលមាននិមិត្តសញ្ញាជាសុភាសិតដែលសរសេរពីពាក្យសំណាងល្អ ។ ហើយសុភាសិតទាំងនោះត្រូវព្យួរជាគូៗ ហើយជាក្រដាសពណ៌ក្រហមដែលក្រដាសទាំងនោះតំណាងឱ្យសុភមង្គលសុខភាពអាយុវែងដល់គូស្វាមី និងគ្រួសារទាំងមូល ។

-ដាក់ដើមក្រូចនៅកណ្តាលតុ ជានិមិត្តរូបនាំមកនូវសំណាងល្អ ព្រោះក្រូចត្រូវគេចាត់ទុកថា មានទ្រង់ទ្រាយដូចជាពីរ៉ាមីត ដែលតំណាងឱ្យភាពអមតៈ និងកិត្តិយសល្បីល្បាញ រួមជាមួយផ្លែប៉ោមក្រហមជាច្រើនដែលជានិមិត្តសញ្ញានៃសំណាងល្អ ។

-តាមលក្ខណៈប្រពៃណីទំនៀមទម្លាប់គឺគេទាមទារ ព្រះមាន់ ពីព្រោះវាជាចំណុចសំខាន់មួយនៃពិធីបុណ្យចូលឆ្នាំចិន ។ វាគឺជាជំនឿចាស់ដែលព្រះមាន់គឺជាវិញ្ញាណដែលរស់នៅក្នុងផ្ទះ ។ មុខងាររបស់ព្រះមាន់ គឺជាអ្នកនាំសារទៅឱ្យ Jade Emperror (ស្តេចនៃព្រះអាទិទេពទាំងឡាយ) ថាតើគ្រួសារទាំងឡាយធ្វើអ្វីខ្លះនៅក្នុងឆ្នាំចាស់ ហើយស្តេចមាន់នឹងចាកចេញទៅរាយការណ៍នៅថ្ងៃទី២៣ នៃខែចុងក្រោយនៃឆ្នាំនីមួយៗ ។ ហើយនៅយប់ដែលព្រះមាន់ចាកចេញនោះ គ្រួសារនីមួយៗនឹងធ្វើអាហារពិសេសសម្រាប់ព្រះមាន់ គេនឹងសរសេរធម៌ និងរូបមាន់នៅក្នុងក្រដាសក្រហមរួចដាក់ចូលទៅក្នុងមាន់របស់គេ ។ ហើយនៅក្នុងគ្រួសារនីមួយៗពេលនោះគេនិយាយតែរឿងល្អៗអំពីសត្វមាន់តែប៉ុណ្ណោះ ។ ហើយព្រះមាន់និងត្រឡប់មកវិញ គឺនៅថ្ងៃទីមួយនៃបុណ្យចូលឆ្នាំថ្មី ។

-ទិញសម្លៀកបំពាក់ថ្មីសម្រាប់បុណ្យចូលឆ្នាំថ្មី ។

-កាត់សក់នៅក្នុងអំឡុងពេលចូលឆ្នាំ ព្រោះមានជំនឿថា នាំមកនូវសំណាងល្អសម្រាប់១២ខែ ។

-ព្យួររបស់ ឬបិទក្រដាសក្រហមគ្រប់កន្លែង ព្រោះវានាំមកនូវសំណាងល្អ ។

-ត្រូវចាត់ការឱ្យរួចរាល់នូវបំណុលទាំងឡាយដែលជំពាក់គេ ៕

GENERAL DENTISTRY
ហួ ឌួង ពេទ្យធ្មេញសម្រាប់គ្រួសារ
466 Merrimack Street. Lowell, MA 01854
( Near City Hall ) / 978-441-1005

យើងទទួលយកគ្រប់ក្រុមហ៊ុនធានារ៉ាប់រងសុខភាព និងការធានារ៉ាប់រងសុខភាពមនុស្សចាស់
យើងបើកទ្វារទទួលភ្ញៀវ ៥ថ្ងៃ ក្នុងមួយសប្តាហ៍
បិទទ្វារ : ថ្ងៃព្រហស្បតិ៍ និងថ្ងៃ អាទិត្យ
ទូរស័ព្ទដើម្បីណាត់ជួប (978) 441-1005
ម៉ោងធ្វើការពីម៉ោង 10ព្រឹក ដល់ 6ល្ងាច
ថ្ងៃសៅរ៍ ពីម៉ោង 10ព្រឹក ដល់ 4រសៀល
យើងមានបុគ្គលិកនិយាយភាសាខ្មែរ

HOA DUONG, D.M.D., P.C.
GENERAL DENTISTRY
គ្រូពេទ្យជំនាញនិងមានបទពិសោធន៍ច្រើនឆ្នាំក្នុងការពិនិត្យ ថែរក្សា និងព្យាបាលជម្ងឺធ្មេញទូទៅ
978-441-1005

Open: Monday, Tuesday, Wednesday, and Friday from 10 a.m. - 6 p.m.
Saturday: from 10 a.m. - 4 p.m.
Closed: Thursday & Sunday
We accept all dental insurance & Medicaid

តមកពីទំព័រទី ១

# អត្ថន័យមេរុ និងជំនឿថ្វាយព្រះភ្លើង...

•••"បន្ទាប់ពីបានតម្កល់អស់រយៈពេល១០៥ថ្ងៃក្នុងប្រាសាទទេវាវិនិច្ឆ័យព្រះបរមសពត្រូវបានយាងដង្ហែចេញពីព្រះបរមរាជវាំងមកតម្កល់នៅវាលព្រះបរមមេរុរយៈពេល៣ថ្ងៃទើបធ្វើពិធីថ្វាយព្រះភ្លើង ។ ថ្វីត្បិតតែនៅក្នុងពិធីដង្ហែមានមនុស្សរាប់សែននាក់បានចូលរួមពិធីជាប្រវត្តិសាស្ត្រ និងមនុស្សជំនាន់ក្រោយពុំដែលបានឃើញពិធីនេះក៏នៅមានអត្ថន័យអាថិកំបាំងជាច្រើនទៀត ដែលមនុស្សភាគច្រើនមិនទាន់យល់បាន ។ នោះដូចជាការតម្កល់ព្រះបរមសព.ការសាងព្រះមេរុដើម្បីថ្វាយព្រះភ្លើង គឺជាពិធីដ៏មានសារសំខាន់បំផុតដែលអ្នកបុរាណវិទ្យាលើកថា គឺដើម្បីបញ្ជូនព្រះវិញ្ញាណក្ខន្ធព្រះមហាក្សត្រយាងទៅទេវលោកឬឋានព្រះអាទិទេព" ។

នៅវេលាម៉ោង៨និង៣០នាទី ព្រះបរមសពត្រូវបានដង្ហែតាមរាជរថតូចចេញពីក្នុងព្រះបរមរាជវាំងតាមទ្វារជ័យយាងទៅតម្កល់លើរាជរថបុស្បុកដែលស្ថិតនៅមុខវេទិកាបុណ្យអុំទូកលើកំណាត់តីរវិថីព្រះ ស៊ីសុវត្ថិ នៅមុខព្រះបរមរាជវាំង ហើយដង្ហែព្រះរាជរថបុស្បុកដែលតម្កល់ព្រះបរមសពតាមតីរវិថីព្រះស៊ីសុវត្ថិឆ្ពោះទៅទិសខាងជើងដល់មុខវត្តឧណ្ណាលោមឈប់ត្រង់រូបសំណាកតេជោយ៉ត តេជោមាស និមន្តព្រះសង្ឃ៥០អង្គ ដែលគង់រង់ចាំជាស្រេចបង្សុកូលថ្វាយព្រះរាជកុសល ។

បន្ទាប់មកដង្ហែព្រះបរមសពទៅដល់វិថីបក្សីចាំក្រុងហើយបត់ទៅទិសខាងលិចដល់មុខរមណីយដ្ឋានវត្តភ្នំ ឈប់ខាងកើតរមណីយដ្ឋានវត្តភ្នំនិមន្តព្រះសង្ឃ៥០អង្គដែលគង់ចាំទីនោះស្រាប់បង្សុកូលថ្វាយព្រះរាជកុសល និងបន្តក្បួនព្រះបរមសពបត់មួយជុំរមណីយដ្ឋានវត្តភ្នំរួចឆ្ពោះទៅតាមមហាវិថីព្រះនរោត្តមទៅទិសខាងត្បូងដល់មុខវិទ្យាល័យព្រះស៊ីសុវត្ថិឈប់និមន្តព្រះសង្ឃ៥០អង្គបង្សុកូលថ្វាយព្រះរាជកុសល ។ បន្តមកទៀតដង្ហែក្បួនព្រះបរមសពដល់ខាងលិចវិមានឯករាជ្យឈប់និមន្តព្រះសង្ឃ៥០អង្គដែលគង់ចាំជាស្រេចបង្សុកូលថ្វាយព្រះរាជកុសល ហើយដង្ហែក្បួនព្រះបរមសពព្រះករុណាព្រះបរមរតនកោដ្ឋតាមមហាវិថីព្រះសីហនុទៅទិសខាងកើត ។ លុះដល់កែងវិថីសុធារសបត់ទៅទិសខាងជើងឆ្ពោះទៅកាន់វាលព្រះមេរុ រួចហែប្រទក្សិណ៣ជុំព្រះមេរុជាឧត្តរាព័តិ ទើបតម្កល់ព្រះបរមសពក្នុងព្រះបរមមេរុរយៈពេល៣ថ្ងៃទើបថ្វាយព្រះភ្លើង ។

**• អ្វីទៅជាព្រះមេរុ ឬព្រះមេន?**

នៅក្នុងសំណេរមួយរបស់លោកបណ្ឌិត មីសែល ត្រាណេ បានរៀបរាប់ថា ក្នុងសង្គមបុរាណការកសាងព្រះមេរុ ឬព្រះមេន គឺជាព្រះរាជពិធីមួយដ៏សំខាន់សម្រាប់ព្រះមហាក្សត្រខ្មែរ ។ ក្នុងជីវិតរបស់ម្ចាស់ជីវិត និងផែនដី (ស្ដេច) មានព្រឹត្តិការណ៍តែពីរទេ ដែលសំខាន់ជាងគេបំផុតគឺពិធីរាជាភិសេក និងពិធីបុណ្យព្រះសព ។ ការប្រកាន់នូវប្រពៃណីបរមបុរាណនេះត្រូវបានគេទទួលថា ជាធាតុមួយចាំបាច់នៃរបបរាជានិយមហេតុនេះហើយទើបយើងឃើញមានការសាងសង់ព្រះបរមមេរុសម្រាប់តម្កល់ព្រះសព និងសម្រាប់ថ្វាយព្រះ







ព្រះមហាក្សត្រ និងសម្ដេចយាយក្នុងថ្ងៃដង្ហែព្រះបរមសព

ភ្លើងព្រះបរមសពនៅពេលដែលអតីតព្រះមហាក្សត្រទ្រង់យាងសោយទិវង្គតដូចអតីតព្រះមហាក្សត្រខ្មែរព្រះបាទនរោត្តមទី១ នៅខែមករា ឆ្នាំ១៩០៦ និងព្រះបាទស៊ីសុវត្ថិ នៅខែមីនា ឆ្នាំ១៩២៨ជាដើម ។

ដូច្នេះបច្ចុប្បន្នក៏ដូចជាអតីតកាលដ៏យូរលង់មហារុងរឿងថ្កើងថ្កានដែរ ការសាងសង់ព្រះមេរុ ឬព្រះមេនដើម្បីប្រារព្ធព្រះរាជពិធីតម្កល់ព្រះសព និងថ្វាយព្រះភ្លើងព្រះសពព្រះបាទនរោត្តមសីហនុជាទីគោរពសក្ការៈដ៏ខ្ពង់ខ្ពស់បំផុតនាពេលនេះបានទទួលនូវការយកចិត្តទុកដាក់ និងទទួលខុសត្រូវខ្ពស់បំផុតពីសំណាក់ប្រមុខដឹកនាំរាជរដ្ឋាភិបាលនៃព្រះរាជាណាចក្រកម្ពុជាទី២ ។

ការសាងសង់ព្រះមេរុ ត្រូវប្រើរយៈពេលយូរ និងថវិការជាតិច្រើន ហើយសំណង់ដ៏ស្កឹមស្កៃនេះតុបតែងលម្អដោយបុស្បុកអមដោយអគារឧបសម្ព័ន្ធជាច្រើនជុំវិញ ។ ព្រះមេរុមានកម្ពស់ប្រមាណជា៤៦ម៉ែត្រ ប្រកបដោយក្បូរក្បាច់រចនាយ៉ាងល្អប្រណីត គឺជាមោទនភាពរបស់ជាតិខ្មែរយើងទាំងមូល ។

ពាក្យព្រះមេរុ ឬព្រះមេនដែលជាពាក្យកម្លាយ គឺជាពាក្យផ្សំរវាងពាក្យ"ព្រះ"ជាភាសាខ្មែរ និងពាក្យមេរុ ឬ"សិនេរុ"ជាពាក្យសំស្ក្រឹត ។ ពាក្យនេះ គឺឈ្មោះនៃភ្នំដ៏ពិសិដ្ឋមួយនៅព្រៃហិមពាន្តនៃលោកធាតុវិទ្យាឥណ្ឌូ-ខ្មែរ ហើយក៏ជាសំណង់ធ្វើអំពីឈើសម្រាប់បូជាព្រះសពព្រះមហាក្សត្រដែរ ។ ការសាងសង់សំណង់សម្រាប់ថ្វាយព្រះភ្លើងព្រះមហាក្សត្រនេះត្រូវអនុលោមទៅតាមក្រឹត្យក្រមនៃលោកធាតុនៃលទ្ធិព្រហ្មញ្ញសាសនា ។

សូមបញ្ជាក់ថា ក្នុងលោកធាតុវិទ្យានៃលទ្ធិព្រហ្មសាសនាបានចែងថា ពិភពលោកយើងនេះមានរាងបួនជ្រុងសំប៉ែតស្មើ ដែលនៅចំកណ្ដាលមានទ្វីបមួយយ៉ាងធំឈ្មោះថា ជម្ពូទ្វីប ។ ជម្ពូទ្វីបមានទ្វីបតូចចំនួនប្រាំមួយទៀត ព្រមទាំងមហាសមុទ្រដែលហ៊ុមព័ទ្ធជុំវិញដោយជួរភ្នំជាកំពែង ។ នៅចំកណ្ដាលជម្ពូទ្វីបគេឃើញមានភ្នំមួយខ្ពស់ជាងគេ គឺភ្នំសុមេរុជាចន្ទល់ ឬជាស្នូលនៃចក្រវាល ។ នៅលើកំពូលភ្នំសុមេរុ គឺជាឋានទេវលោក ឬឋានរបស់ព្រះអាទិទេព ព្រះព្រហ្ម ព្រះឥន្ទ្រ ។ ម្យ៉ាងវិញទៀត ទេវឋាននេះមានទិសប្រាំបីដែលទ្រទ្រង់បីបាច់ថែរក្សាដោយទេពបន្ទាប់បន្សំទាំងប្រាំបីអង្គដែលជាឆ្មាំប្រកបដោយជ័យចេស្ដាដ៏ខ្លាំងពូកែអស្ចារ្យ ។

ដូចនេះ តាមការអធិប្បាយក្នុងលោកធាតុវិទ្យាយើងដឹងថា ភ្នំដែលស្ថិតនៅចំកណ្ដាលចក្រវាល ឬពិភពលោកយើងនេះមានឈ្មោះថា ភ្នំសុមេរុ ឬសុមេរ ឬក៏សុម៉េរ៍ ។ ហើយម្យ៉ាងទៀត តាមប្រភពសិលាចារឹករាល់ប្រាង្គប្រាសាទខ្មែរដែលបុព្វការីជនខ្មែរបានសាងសង់នោះ សុទ្ធសឹងតែតំណាងឱ្យភ្នំសុម៉េរ៍ទាំងអស់ ព្រោះជាប្រាសាទភ្នំតែបានគេបំព្រួញឱ្យតូច ។

ដូចនេះ ក្នុងក្រសែភ្នែកខ្មែរបុរាណភ្នំ កណ្ដាល ឬព្រះសុមេរុ គឺស្ថិតនៅចំកណ្ដាលនៃព្រះរាជធានីដែលតំណាងដោយប្រាសាទភ្នំមួយ គឺជាកន្លែងស័ក្ដិសិទ្ធិបំផុតនៅលើលោកយើងនេះ ។ ព្រោះគឺជានិមិត្តរូបនៃទេវឋានដែលមានព្រះអាទិទេព ដ៏មាន

តទៅទំព័រទី ១៤

USA AUTO GLASS
ទើបបើកថ្មី
▸ ជួសជុលរថយន្ត ▸ លាងរថយន្ត
▸ ប្ដូរកញ្ចក់
▸ ពិនិត្យរថយន្តរបស់រដ្ឋ State Inspection: $65
▸ ដូរប្រេងម៉ាស៊ីន Oil Change: $29.99
▸ ដូរស្បែកប្រាំង Brake: $50
▸ លាងឡាន Car wash: $19.99
1822 South 7th Street. Philadelphia, PA 19148
Phone: 215-271-7190

តមកពីទំព័រទី ១

## មន្ទីរសុខភាពសហគមន៍បើកសម្ពោធ...

បានមកពីសហព័ន្ធ លុយចំនួនមួយទៀត គឺយកពី "តាក់ក្រេឌីត" រីឯសហគមន៍ត្រូវចូលរួមនូវថវិកា ចំនួន៥លាន ។



-ហើយបើរក៥លាននោះ បាននឹងមានជំនួយ "ប្លេត"៦០ម៉ឺនផ្តល់បន្ថែម ។ ដោយការព្យាយាម និងប្តេជ្ញាចិត្តរបស់សហគមន៍ ឈ្មោះមនុស្សប្រមាណ ១៥០០នាក់ បានត្រូវផ្សព្វផ្សាយថា បានផ្តល់ធន ធានតិច ឬច្រើនប្រមូលប្រាក់៥លាននោះ រហូតបានសម្រេចឱ្យកើតជាមណ្ឌលសុខភាពសហគមន៍ឡូវែលដ៏ត្រចេះត្រចង់នេះបាន ។

ពិធីសម្ពោធមជ្ឈមណ្ឌលសុខភាពសហគមន៍ បានប្រព្រឹត្តទៅនៅ ចំពោះមុខសាធារណជន ៥០០នាក់ -លោក ខេវិន ខប្លីន ជា ប្រធានសមាគមខ្មែរនិយាយថា : "ថ្ងៃនេះជាថ្ងៃផ្តល់សញ្ញាមួយដែលបង្ហាញពីការផ្លាស់ប្តូរយ៉ាងសំខាន់ខាងផ្នែកសុខភាពនៅឡូវែលនេះ ជាពិសេសសំរាប់ជនជាតិអាស៊ីអាគ្នេយ៍ដែលបានរស់នៅយ៉ាងច្រើននៅទីនេះ -មជ្ឈមណ្ឌលសុខភាពសហគមន៍បានបោះជំហ៊ានទៅមុខយ៉ាងវែង នាថ្ងៃនេះក្នុងការបង្កើតគុណភាពខាងថែរទាំសុខភាព ដើម្បីឱ្យពលរដ្ឋមានសុខភាពល្អយូរ មិនចាំបាច់មកពេទ្យច្រើនដង"លោកបន្តថា "ចំណែកឯសុខភាពផ្លូវចិត្តវិញ គឺជាបញ្ហាដ៏ធំមួយនៅរដ្ឋម៉ាសាឈូសែត ដោយសារសម្បូរអំពើហឹង្សា ទោះជានៅក្នុងគ្រួសារ ក៏ដូចនៅតាមផ្លូវ ខ្ញុំគិតថា ពីនេះទៅ២ឆ្នាំទៅមុខនឹងមានការយកចិត្តទុកដាក់ជាពិសេសចំពោះជំងឺផ្លូវចិត្តនេះ ដែលពលរដ្ឋមកពីអាស៊ីអាគ្នេយ៍ទទួលរងច្រើនឆ្នាំ មុនមកដល់ស.រ.អា នេះ"...។



លោក វ៉ាស៊ី អាន នាយកប្រតិបត្តិសមាគមខ្មែរនិយាយថា "ខ្ញុំមានមោទនភាពណាស់ដោយឃើញមន្ទីរពេទ្យដ៏ធំទំនើបកើតឡើងនៅ

កណ្តាលក្រុងឡូវែលដែលខ្មែរយើងជាច្រើនរស់នៅហើយកន្លែងនេះស្រួលសំគាល់ណាស់ពីព្រោះពីដើមជាសមាគមខ្មែរមានគេស្គាល់ច្រើន




តទៅទំព័រទី ១៦

តមកពីទំព័រទី ១៣

## អត្ថន័យមេរុ និងជំនឿថ្វាយព្រះភ្លើង...

មហិទ្ធិឫទ្ធិគង់ប្រថាប់ដើម្បីបីបាច់ថែរក្សាព្រះនគរ ។

នៅក្នុងសង្គមខ្មែរបុរាណគេមានជំនឿថា ក្រោយពីព្រះ-មហាក្សត្រចូលព្រះទីវង្គត់ទៅនោះ ព្រះវិញ្ញាណក្ខន្ធនឹងយាងចាប់ព្រះបដិសន្ធិជាថ្មីឡើងវិញ ជាព្រះអាទិទេពនៅឯព្រហ្មលោក (ឋានព្រះព្រហ្ម) ឬឋានព្រះឥន្ទ្រ (បែបពុទ្ធនិយម) ឯណោះ ។ ព្រោះថាព្រះវិញ្ញាណក្ខន្ធរបស់ទ្រង់នៅស្ថិតស្ថេរជារៀង រហូតមិនអាចសាបសូន្យទេ ។ ដើម្បីញ៉ាំងឱ្យដំណើរការនេះប្រកបដោយភាពរលូនគេត្រូវការនូវធាតុមួយដ៏ពិសិដ្ឋ គឺព្រះអគ្គី ដើម្បីជម្រះភាពគ្រោតគ្រាតនៃព្រះកាយហើយពាំនាំព្រះវិញ្ញាណក្ខន្ធព្រះមហាក្សត្រទៅកាន់ព្រហ្មលោកទើបតម្រូវឱ្យមានពិធីថ្វាយព្រះភ្លើង ។ គឺតាមរយៈយន្តការនេះហើយ ទើបព្រះមហាក្សត្រទទួលបាននូវទេវភាពក្នុងន័យថា ក្លាយទៅជាវត្ថុស័ក្តិសិទ្ធិព្រោះក្រោយពីសុគតទៅព្រះវិញ្ញាណក្ខន្ធព្រះអង្គយាងទៅឋានសួគ៌ ។

លហេតុអ្វីប្រជារាស្ត្រខ្មែរគោរពស្រឡាញ់សម្តេចព្រះ-នរោត្តមសីហនុខ្លាំងបំផុត?

តាំងពីក្រោយសម័យអង្គរមកមានតែព្រះមហាក្សត្រសម្តេចព្រះនរោត្តម សីហនុ ទេ ដែលធ្វើឱ្យប្រទេសខ្មែរទទួលបានឯករាជ្យ (ដែលពីមុនធ្លាប់តែបារាំង សៀម ជប៉ុន ត្រួតខ្មែរ) ។ ព្រះអង្គទាមទារបានមកវិញនូវទឹកដីខេត្តសៀមរាប, កំពង់ធំ, បាត់ដំបង, ស្ទឹងត្រែង, ប្រាសាទព្រះវិហារដែលសៀមទន្ទ្រានកាន់កាប់ដោយខុសច្បាប់ ។

ព្រះអង្គមានទសពិធរាជធម៌មិនរើសអើងកូនចៅ, ស្រឡាញ់កូនចៅគ្រប់ស្រទាប់វណ្ណៈយាងចុះសួរសុខទុក្ខប្រជារាស្ត្រយ៉ាងជិតស្និទ្ធនិងគ្រប់ច្រកល្ហក, ព្រះអង្គលំអោនព្រះកាយវិចារចិត្តសំពះរាស្ត្រកែទម្រង់ខុសពីស្តេចខ្មែរមុនៗដែលប្រជារាស្ត្រមិនសូវហ៊ានមើលព្រះភ័ក្រ្ត ។ ព្រះអង្គចូលចិត្តធ្វើសប្បុរសធម៌ដល់កូនចៅ, ព្រះរាជឱង្ការផ្អែមល្ហែមទន់ភ្លន់, ស្លូតបូតរមែងអភ័យទោសដល់កូនចៅតែរឹងមាំម៉ឺងម៉ាត់ដាច់ខាតជាមួយបរទេសឈ្លានពាន ។

ព្រះអង្គជាព្រះមហាក្សត្រ តទៅទំព័រទី ២២

សេចក្តីជូនដំណឹង

មានទទួលពាក្យសិស្សសុំចូលរៀនចាប់ពី K-6 ឆ្នាំ ២០១៣-២០១៤

សាលារៀនឆាទ័រមានផ្តល់ជូនៈ

- ការសិក្សាពេលថ្ងៃ និងឆ្នាំមានរយៈពេលវែង
- កម្មវិធីសិស្សរៀនពូកែ
- ការសិក្សាមិនបង់ថ្លៃ – យើងជាសាលារៀនសាធារណៈ

LCCPS
LOWELL COMMUNITY
CHARTER PUBLIC SCHOOL

ថ្ងៃផុតកំណត់ទទួលពាក្យសិស្សសុំចូលរៀនៈ
នៅថ្ងៃអង្គារ ទី២៦ ខែកុម្ភៈ ម៉ោង ១២:០០ ថ្ងៃត្រង់

ថ្ងៃអង្គារ ទី១២ ខែកុម្ភៈ ពីម៉ោង ៥:៣០-៧:០០ ល្ងាច

206 Jackson Street • Lowell, MA 01852 • Phone (978) 323-0800 • www.lccps.org

# ឆ្នាំដែលឆុង នឹងឆ្នាំម្សាញ់

●●●វៀងរាល់ចូលឆ្នាំចិនរមែងមានឆ្នាំកំណើតខ្លះ ឆុងជាមួយនឹងទេវតា ឆ្នាំថ្មីនេះ បើតាមជំនឿរបស់ប្រជាជនចិន ។ ក្នុងឱកាសឆ្នាំថ្មី ២០១៣ មានឆ្នាំកំណើតមនុស្សចំនួន៤ដែលក្នុងក្បួនតម្រារបស់ចិនបានកំណត់ទុកថា ត្រូវឆុងនឹងទេវតារក្សាឆ្នាំម្សាញ់ព្រះនាមថៃសួយអឿកក្នុងនោះមានដូចជា:

-មនុស្សកើតឆ្នាំកុរឆុង១០០ភាគរយ ហើយអ្នកដែលឆុងខ្លាំងជាងគេ គឺមនុស្សអាយុ៦៦ឆ្នាំ ៤២ឆ្នាំ និង ៦ឆ្នាំ ។

-មនុស្សកើតឆ្នាំខាល ក៏ជាឆ្នាំឆុងទេវតាថៃសួយ ឬជាឆ្នាំបៀតបៀន និងជាឆ្នាំដែលផ្តល់សំណាងអាក្រក់ដល់ឆ្នាំម្សាញ់ ។ មនុស្សដែលឆុងខ្លាំងជាងគេ គឺអ្នកមានអាយុ៧៥ឆ្នាំ៥១ឆ្នាំ និង ១៥ឆ្នាំ ។

-មនុស្សកើតឆ្នាំម្សាញ់ ជាឆ្នាំដែលសង្កត់ពីលើទេវតាថៃសួយ ។ មនុស្សដែលឆុងខ្លាំងជាងគេ គឺអ្នកមានអាយុ៨៤ឆ្នាំ និង២៤ឆ្នាំ ។

-មនុស្សកើតឆ្នាំវក ក៏ជាឆ្នាំឆុងនឹងទេវតាថៃសួយដែរ និងជាឆ្នាំនៃការបែកបាក់ ។ មនុស្សដែលឆុងខ្លាំងជាងគេ គឺអាយុ៩៣ឆ្នាំ និង ៣៣ឆ្នាំ ។

ឆ្នាំម្សាញ់២០១៣ គឺជាពស់លេងទឹកមានទេវតាព្រះនាមថៃសួយទទួលតួនាទីមើលថែ



គ្រប់គ្រងឆ្នាំម្សាញ់ បើតាមក្បួនតម្រាឆ្នាំទាំង១២របស់បុរាណចិន ទេវតាព្រះនាម ឆឺតូតៃជៀងកុងជាទេវតាមានតួនាទីគ្រប់គ្រងជោគជតារាសីសម្រាប់ឆ្នាំ១៩៥៣-២០១៣ ។ តាមជំនឿប្រជាជនចិន គេជឿថា ទេវតាអង្គនេះ អាចប្រទានឱ្យនូវសេចក្តីសុខ និងទុក្ខសោកដល់នរណាម្នាក់ក៏បានដែរ ។

ដូច្នេះអ្នកដែលមានកំណើតឆុងជាមួយនឹងទេវតាឆ្នាំម្សាញ់ គួរឆ្លៀតឱកាសទៅធ្វើសក្ការៈបូជាគ្រោះ ព្រោះចាត់ទុកថា មានឱកាសរងនឹងផលអាក្រក់ដល់កិច្ចដំណើរនៃជីវិតប្រចាំថ្ងៃជាពិសេសដើម្បីឱ្យទទួលបាននូវសេចក្តីសុខសប្បាយពេញមួយឆ្នាំ២០១៣នេះតែម្តង ។

**វិធីធ្វើសក្ការៈបូជា**

ការធ្វើសក្ការៈបូជាចំពោះទេវតា និងវត្ថុស័ក្តិសិទ្ធិទាំងឡាយ ដើម្បីឱ្យជួយតាមថែរក្សាការពារលោកអ្នកនោះ គឺមានពិធីនិយមធ្វើខុសៗពីគ្នាដែលខាងក្រោមនេះជាវិធីធ្វើសក្ការៈបូជាចំពោះទេវតា ដើម្បីឱ្យជួយទាំងការពារ និងបញ្ចៀសគ្រោះចង្រៃឧបទ្រពធ្វើយ៉ាងណាឱ្យក្នុងឆ្នាំថ្មីនេះ កើតមានតែសុភមង្គល និងភាពរីកចម្រើន ។ ព្រោះឥទ្ធិពលទេវតាឆ្នាំម្សាញ់នេះ នឹងគ្របដណ្តប់លើជោគជតារាសីមនុស្សដែលមានឆ្នាំកំណើតឆុងជាមួយខ្លាំងបំផុត ។




ឆ្នាំទាំង៤ ដែលឆុងជាមួយនឹងឆ្នាំម្សាញ់ ឬរងនូវផលប៉ះពាល់ស្ទើរតែគ្រប់ផ្នែកក្នុងនោះមិនថា ការងារ លុយកាក់ ស្នេហា ហើយផ្នែក ដែលរងផលប៉ះពាល់ខ្លាំងជាងគេ គឺរឿងការងារ និងសុខភាពបញ្ហាធំរបស់ខ្លួនឯង និងសាច់ញាតិចាស់ទុំ ។ ទោះបីថាឆ្នាំថ្មីនេះជាឆ្នាំដែលត្រូតគ្នាលើឆ្នាំកំណើតក្តី តែក៏នៅមានវិធីជួយកាត់បន្ថយឥទ្ធិពលដែលរងនឹងផលអាក្រក់បានដែរ ។

ដូច្នេះអ្នកដែលមានឆ្នាំឆុង គួរនាំយកជោគជតារាសីទៅផ្ញើជាមួយនឹងទេវតាថៃសួយអឿក ដើម្បីឱ្យជួយបោសវាសកម្ចាត់ឧបទ្រពចង្រៃដែលជាវត្ថុអពមង្គលដោយធ្វើឡើងនៅតាមអាស្រមអ្នកតាចិន ។ ក្រៅពីនេះ បើមានប្រើចង្កៀងដុតប្រេងគួរឧស្សាហ៍ចាក់ប្រេងថែម ឬពន្លែងសត្វមានជីវិតទាំងសត្វស្លាប និងត្រីដើម្បីរំដោះគ្រោះ ។

ក្រៅពីនេះបើគ្មានការចាំបាច់ទេ ហាមចូលរួមបុណ្យសពទាំងពិធីដង្ហែបញ្ចុះ ឬបូជា ព្រោះអាចនាំមកនូវភាពអពមង្គលដល់ខ្លួនឯង ។ ចំណែកវិធីរំដោះគ្រោះគួរជ្រើសរើសយកថ្ងៃសុក្រថ្វាយសង្ឃទាន៩ថាសលោះជីវិតគោ ឬក្របី និងឧស្សាហ៍ថែមប្រេងចង្កៀង ៕

Red Rose
RESTAURANT
ភោជនីយដ្ឋាន
កូលាបក្រហម
ម្ចាស់ថ្មី _ម្ហូបឈ្ងុយឆ្ងាញ់
អញ្ជើញមកចូលរួមមិនខុសបំណងទេ សូមអរគុណ!
Mon-Sun
8am -8pm
សម្លម្ជូរ គ្រឿង $11.99
*ម្ហូបឆ្ងាញ់ជាងមុន តែតម្លៃនៅថោក ដូចមុនដដែល
*សេវាកម្មរហ័សទាន់ចិត្ត និងរួសរាយរាក់ទាក់
(978) 452-5400
Pailin Plaza
716 Middlesex St. Ste 1
Lowell, MA 01851

ហាងមាស គីម ង៉ុក
នៅវេសហាតហ្វឺត
KIM NGOC
JEWELRY
មានលក់ដុំ ឬរាយ ឬដូរ ឬធ្វើប័ណ្ណសំរាប់អំណោយមានធ្វើប្លែនពន្យាពេលបង់ប្រាក់
-ទទួលភាន់បញ្ចាំ មានចុះថ្លៃរហូតដល់ ៦៥%
សម្រាប់ ពេជ្រមកពីហុងកុង មានជាងអលង្កានៅក្នុងហាងជួសជុលបានភ្លាមៗ
ពេលវេលាបើក : ថ្ងៃច័ន្ទ ដល់ថ្ងៃអាទិត្យ
ពីម៉ោង ១០ព្រឹកដល់៧ល្ងាច
Open: Mon-Sun:
10am-7pm
150 Shield Street Plaza. West Hartdord, CT 06110
Tell: (860) 953-5803, Fax:(860)953-5802

តមកពីទំព័រទី ១៤
## មន្ទីរសុខភាពសហគមន៍ឡូវែលបើក...

-តាមពិតទៅពេទ្យនេះមិនមែនបំរើតែសុខភាពខ្មែរទេ មានលាវ មានភូមា មានសាសន៍អាស៊ីផ្សេងៗទៀតជាច្រើនដែលបានមកតាំងផ្ទះសម្បែងនៅទីនេះផងដែរ..."។

អនុវេជ្ជបណ្ឌិត ឆាន ទូច នៃមជ្ឈមណ្ឌលសុខភាពមេត្តាថា "មជ្ឈមណ្ឌលសុខភាពមេត្តានៅតែជាមេត្តាដដែល ទទួលព្យាបាល ដូចពេលមុនៗ រីឯមណ្ឌលសុខភាពសហគមន៍ថ្មី និងបង្កើតលទ្ធភាពព្យាបាលរឹតតែបានច្រើនឡើង -ខ្ញុំជឿថា ជនជាតិអាស៊ីនៅតែបន្តមកទទួលការព្យាបាលនៅមេត្តានេះ ដោយសារតែការរៀបចំទាំងឡាយធ្វើស្របតាមទស្សនៈវប្បធម៌អាស៊ីទាំងអស់ ដែលនៅតែធ្វើឱ្យពួកគេចូលចិត្តតែបើអ្នកទៅចង់ទៅខាងថ្មីវិញ ក៏អាចទៅបាន -យើងបានផ្តើមពីជាង១០ឆ្នាំមុនពីគ្មានអ្នកជំងឺសោះ ឥឡូវអ្នកជំងឺឡើង៧-៨000ក្នុងមួយឆ្នាំធ្វើឱ្យអ្នកជំងឺខ្លះរង់ចាំទទួលការព្យាបាលច្រើនខែ..."។



លោក ប៉ាទ្រីក ម័រហ្វី ជាចៅហ្វាយក្រុងឡូវែលបាន និយាយនៅ ឱកាសសម្ពោធនោះដែរថា: "គឺជាថ្ងៃដ៏រីករាយមួយដែរ ខ្ញុំបានឃើញមជ្ឈមណ្ឌលសុខភាពសហគមន៍វេចូលកាន់អាគារដ៏ធំនេះ ខ្ញុំមានតែជូនពរឱ្យការវិវត្តន៍ក្នុងអគារនេះនូវអ្វីៗដែលប្រសើរបំផុត... សំរាប់សាលាក្រុងការនេះមានសារៈសំខាន់ណាស់ដែលពលរដ្ឋអាចទទួលការថែរក្សាសុខភាពបានប្រសើរក្នុងតម្លៃដែលពលរដ្ឋអាចទទួលយកបាន... ពុំមែនយើងជាអ្នកជួយឱ្យគ្រប់គ្នាអាចធានាការព្យាបាលបានទេ នេះគឺតួនាទីរបស់មជ្ឈមណ្ឌល... ខ្ញុំយល់ថា នៅក្នុងអាគារថ្មីនេះធ្វើឡើងសម្រាប់ចំណូលចិត្តនៃសាសន៍ច្រើនដ៏ទៃទៀត មិនសម្រាប់តែខ្មែរទេ... បង្កើតមណ្ឌលសុខភាពមេត្តាបង្កើតក្រុងខ្មែរ គឺការទទួលស្គាល់នូវសេចក្តីត្រូវការរបស់ពលរដ្ឋខ្មែរដែលបានមករស់នៅទីនេះហើយត្រូវការរីកដុះដាល"។



គុណសម្បត្តិបន្ថែមនៃមណ្ឌលសុខភាពពេលបង្អស់នេះ គឺបង្កើតការងាយស្រួលជាអតិបរមា និងកាត់បន្ថយការខាតពេលឱ្យនៅតិចបំផុតក្នុងការស្វែងរកការព្យាបាល ៕

តមកពីទំព័រទី ៤
## អ្នកក្រ និងអ្នកមាននៅប្រទេសខ្មែរ...

ព្រឹត្តិការណ៍នៅដើមខែកក្កដាឆ្នាំ១៩៩៧បណ្តាលឱ្យមានការខូចខាតយ៉ាងច្រើនទាំងសម្បត្តិទ្រព្យទាំងជីវិតមនុស្ស? អ្នកជំនួញម៉ូតូនៅអូឬស្សីម្នាក់សម្លាប់ខ្លួនឯងដោយសារការបាត់បង់ទ្រព្យសម្បត្តិ។ យើងទាំងអស់គ្នាដឹងថាសេចក្តីក្រអត់ឃ្លានធ្វើឱ្យមនុស្សភ្លេចសីលធម៌ ភ្លេចគ្រោះថ្នាក់ដល់ខ្លួន ភ្លេចដល់សេចក្តីស្លាប់ទៀតផង។

តាមការសង្កេតរបស់ខ្ញុំអ្នកមានខ្មែរអាចជួយធ្វើឱ្យស្រុកខ្មែរនិងប្រជាពលរដ្ឋចម្រើនទៅមុខបាន គឺអាចជាគន្លឹះជួយធ្វើឱ្យស្រុកខ្មែរនិងប្រជាពលរដ្ឋខ្មែរចាកផុតពីគ្រោះមហន្តរាយបាន។

តើរាជរដ្ឋាភិបាលនិងធនាគារអាចជួយអ្នកមានតាមរបៀបណាដើម្បីឱ្យអ្នកមានសម្រេចគោលបំណងនេះបាន ខ្ញុំសុំជូននៅពេលក្រោយ។

Mr. SosKem
Retired Foreign Service Officer
U.S. Department of State
soskem@yahoo.com

**រកអ្នកធ្វើការ**

**Philadelphia:** យើងរកអ្នកធ្វើការនៅហាងបោក-ហាលខោអាវ
នៅ Upper Darby Laundromat
សូមទូរស័ព្ទទៅ : **267-206-1260**

**DELI BUSINESS FOR SALE**
(Philadelphia លក់ដោយម្ចាស់ហាង)
លក់ហាងកាហ្វេ,ដូណាត់,ធ្វើនំដុត,ស្ថិតនៅក្បែរសកលវិទ្យាល័យ Temple University ( ជ្រុងមហាវិថី Broad និង Girard ) មានមនុស្សធ្វើដំណើរច្រើន ហាងមានលំនឹងល្អជាង១០ឆ្នាំហើយ ម្ចាស់ហាងចូលនិវត្តន៍ ហើយត្រូវការលក់ជាប្រញាប់ ។
ទូរស័ព្ទ **(215) 763 8300** ឬ **(215) 906 2867** សម្រាប់បង្ហាញកន្លែង

**APSARA WIRELESS COMPUTER**
**ទើបបើកថ្មី !**
GRAND OPENING
285 Chelmsford St. Lowell, Ma 01851
Phone: (978)-455-0075
និយាយភាសាខ្មែរ: (978)-876-2875
▶ មានលក់ Sale
▶ ផ្តល់សេវា Service
▶ ជួសជុល Repair
ទូរស័ព្ទ WIRELESS •កុំព្យូទ័រ •ឡាបថប •បរិក្ខាទូរស័ព្ទ •បង់ថ្លៃប៊ីល (Bill Pays)
សូមទៅមើលកន្លែងផ្សេងទៀត Location II: Happy Computer Service
122 Merrimack Street. Lowell, MA 01852 / ទូរស័ព្ទ: (978) 970-1769

# មេធាវីថមាសស្ទីលីអាណូស

- ជួយធ្វើតាក់ដោយមិនបាច់មានលេខសូស្យាល់ (Filling Tax without Social Security)
- ជួយធ្វើគ្រីនកាត ១០ ឆ្នាំអោយបានបន្ទាប់ពីមានការលែងលះគ្នា (Divorced 10 year Green Card)
- ជួយធ្វើគ្រីនកាត ២ ឬ ១០ឆ្នាំ (Help with 2 or 10 year Green Card)
- ជួយអ្នកដែលនៅលើសកំណត់អោយបាននៅក្នុងប្រទេសបន្តទៀត (Help Overstay Bars)
- ជួយការពារកុំអោយគេបញ្ជូនទៅស្រុកវិញបន្ទាប់ពីបានប្រព្រឹត្តិខុសច្បាប់ (Criminal Deportation)
- ជួយរៀបចំឯកសារធានាឪពុកម្តាយកូននិងបងប្អូនមកអាមេរិច (Get Parents, Children and Sibling Here)
- ជួយរៀបចំឯកសារសំរាប់ធានាប្តីប្រពន្ធ ឬគូរដណ្តឹងមកអាមេរិច (Get Spouse or Fiancé Here)
- ជួយរៀបចំឯកសារសុំលែងលះប្តីប្រពន្ធ (Divorce, only in Massachusetts)
- ជួយការពារ និងធ្វើជាតំណាងក្នុងរឿងគ្រោះថ្នាក់ចរាចរណ៍ (Car Accident, only in Massachusetts)
- ជួយធ្វើការតវ៉ានៅចំពោះមុខក្រុមប្រឹក្សាសាលាឧទ្ធរណ៍ផ្នែកអន្តោប្រវេសន៍ (BIA Immigration Appeals)
- ជួយធ្វើឯកសារចូលសញ្ជាតិដល់សាម៉ីខ្លួន និងកូនៗរបស់លោកអ្នក (N-400 and N-600)
- ជួយធ្វើគ្រីនកាតថ្មីបន្ទាប់ពីត្រូវគេលួច ឬបាត់បង់ (I-90, Replacement Green Card)
- ជួយសុំកាតធ្វើការ (Work Card)
- ជួយធ្វើលិខិតធ្វើដំណើរចេញចូល (Re-entry Permit)

# Thomas Stylianos Law Offie

## 287 Appleton Street, Suit 205 Lowell, MA 01852

# Tel: 978-459-5000

## E-mail: Tom@stylianoslaw.com

Attorneys' only licensed in Massachusetts



និពន្ធដោយ គីម ភឿន



●●●ទុក្ខព្រួយមិនមែនធ្វើឱ្យខ្ញុំរីករាយនឹងមានមោទនភាពអ្វីសោះឡើយ ។ ប្រសិនណាខ្ញុំបានដំណឹងនេះតាំងពីមុនមកសមម្លេះខ្ញុំមិនបានចងចិត្តប្រតិព័ទ្ធនាងសោះឡើយ ខ្ញុំនឹងឈរនៅស្ងៀមស្ងាត់ឆ្ងាយពីនាងមិនហ៊ានចូលជិតក្បែរនាងដើម្បីចំណងនៃក្តីស្នេហ៍គ្មានសង្ឃឹម ថានឹងបានសម្រេចនេះឡើយ ។ ហេតុដូចម្តេចបានជានៅក្នុងឋានៈរបស់នាងយ៉ាងនោះនាងបែរជាមកស្រឡាញ់ខ្ញុំទៅវិញ? ខ្ញុំជាសិស្សក្រខ្សត់ម្នាក់រស់នៅជាមួយគ្រួសារនៃបងប្រុសម្នាក់ក៏មិនជាធូរធារអ្វីដែរហើយ មិនទាន់មានអនាគតប្រាកដប្រជាអ្វីទៀតផង ។ ឱព្រះអើយ! ហេតុម្តេចឡើយក៏នាងមិនព្រមវាយ ឬកបង្ហាញនូវអំនួតនៃទ្រព្យសម្បត្តិរបស់នាងនឹងភាពឆ្មើងឆ្មៃចំពោះសោភ័ណភាពដែលនាងមានមកនេះ? ឆ្លងទៅតាមអាកប្បកិរិយាឆ្មើងឆ្មៃទាំងនោះខ្ញុំអាចស្អប់ខ្ពើមជិនឬកនាងខ្ញុំគ្មានពេលណា និងស្រឡាញ់នាងបានឡើយ សមម្លេះខ្ញុំមិនបាច់ត្រូវស្រឡាញ់នាង.ម្លេះសមខ្ញុំមិនបាច់មានក្តីបារម្ភណ៍ទុក្ខព្រួយយ៉ាងនេះដែរ ។ តែឥឡូវខ្ញុំស្រឡាញ់នាងបាត់ទៅហើយ ខ្ញុំមិនអាចបំភ្លេចនាងបានឡើយ... ។

យូរៗម្តងក្នុងឱកាសដែលមានបុណ្យជាតិម្តងៗនាងតែងមកលេងភ្នំពេញដើម្បីបានជួបគ្នា ។ នាងតែងតែនាំមកតាមនាងនូវដំណឹងសង្ឃឹមរីករាយផងនឹងក្តីទុក្ខកង្វល់ផង ។

ប៉ុន្តែរឿងកង្វល់ទុក្ខព្រួយច្រើនតែអូសបន្លាយបានយូរជាងរឿងសប្បាយរីករាយ ។ មានម្តងនោះនាងនិយាយថា " មានគ្រួសារខ្លះគេចេះតែមកសុំស្ទើបាម៉ាក់អូនអនុញ្ញាតិឱ្យគេចូលស្តីដណ្តឹងអូនរៀបការជាមួយកូនកម្លោះគេ ។ នៅចំពោះមុខនៃការលំបាកដោះស្រាយយ៉ាងនោះនាងតែងបានបុរសជាមិត្តមួយរយឆ្នាំ" **តទៅលេខក្រោយ**

# Amazing Moment

*By Phien Kim*

whispering my love to her? My goodness! It is better if I didn't say anything to her; I would not have worries, anxieties and be in this so sad situation.

In the second day of group study, one of her friends showed me a letter and said ironically: " Lucky man! Thida has a lot of friends but she 'choose' only 'you' to write for her when some thing happens here while she would be in her home town with her family." To fade away my shame I courageously grasped the letter and said: "Yes Mme, I am in your order!" Since then our love developed and strengthened our energy, we worked hard and graduated from high school; she chose the Pedagogy Institute, after one year of hard work she was assigned to be high school teacher in her home town and left me with my loneliness in the dormitory of University of Agriculture.

With the long years of separation we might only got one or two letters a month.

Our culture had been hard with the lovers without official engagement. In that time there were no telephone, nothing else; the unique means for communication were only the mails. She was a woman. Moreover she was a teacher who might undergo much more tough discipline, much more difficult and complicated rules than the man did. Our relationship was considered as an underground Cambodian Culture, for myself I didn't care much, but for her …That was a big deal, she would be underestimated by her community as well by her school. I felt that was my responsibility, I have to save her honor, but how could I do?

I always felt my gratitude to her love, a true love that I ever expected in my life. I knew furthermore through her best friend that she has been the unique daughter of a great family in the Svay-Rieng province, her father, the Educational Inspector of that province, her mother, a biggest business Lady exporting goods to Laos and Viet-Nam. In the middle school of her province, known as the queen beauty, she had her honor of offering the packet of flowers to the King of Cambodia every time of his visit to his beloved "children"( his people) in this region. That information made me worried, anxious instead of being happy an proud of. If I had been informed that real situation of that lovely person, beloved image in my dream, I would stand away in silence, not approaching her for this impossible love. Why in that position, she might love me, a poor student living with his poor family's brother, *Continue next Issue*


ហាងខ្មែរជួសជុលរថយន្ត

បើចង់ឱ្យរថយន្តលោកអ្នករត់បានល្អ សូមអញ្ជើញ

**Rathe's Auto Service**

State and Emission Inspaction General Repairs and Maintenance

MON-SAT, 8:30AM-5:30PM
SUN. EMERGENCY ONLY

- ជាងមានបទពិសោធន៍ជាយូរឆ្នាំ -ជួសជុលរថយន្តគ្រប់ប្រភេទ
- មានដូរប្រេង ដូរហ្វ្រាំង ដូរកង់ និងករណីជាច្រើនទៀត ។
- មានត្រួតពិនិត្យគ្រឿងម៉ាស៊ីន DIAGNOSTICS ដោយឥតគិតថ្លៃ
- មានចុះថ្លៃពិសេស ចាប់ពីខែកុម្ភៈ ២០០៨ ទៅ : - ដូរប្រេងក៏រិត ៥ ក្វាត $22
- INSPECTIONS រថយន្តឆ្នាំ 96 up $49.99+ តាក់ -មានជូនប័ណ្ណពិសេសសំរាប់ដូរប្រេងចុះថ្លៃពាក់កណ្តាល នៅពេលយកមកជួសជុលអស់តម្លៃ $150.
- តម្លៃជួសជុលទូទៅ សមរម្យ ដោយទាបជាងហាងជួសជុលផ្សេងៗទៀត ។
- ប្តេជាចិត្តធ្វើជូនដោយហ្មត់ចត់ គុណភាពខ្ពស់ មិនឱ្យខុសបំណងលោកអ្នកឡើយ។ ពិសេស ជួយទៅពិនិត្យដល់កន្លែងនូវរថយន្តណាដែលខូច STARTER ឬធុងអាគុយអស់ភ្លើងដោយឥតគិតថ្លៃ ។ *សូមអរគុណ !*

5105 N.2ND ST., PHILADELPHIA, PA 19120. TEL : (215) 329-2418
Fax : (215) 329-2419. Rath CELL : (215) 431-6376

ក្រុមហ៊ុនទេសចរណ៍

- បំរើលោកអ្នកដោយគ្រប់ក្រុមហ៊ុនអាកាសចរណ៍ សំរាប់ដំណើរហើរក្នុងនិងក្រៅស្រុក
- ជួយរកអ្នកនាំផ្លូវជូនដំណើរទស្សនកិច្ចធ្វើការ
- ពន្យាលិខិតឆ្លងដែនខ្មែរ
- ធ្វើលិខិតអន្តោប្រវេសន៍
- ធ្វើទិដ្ឋាការសំរាប់ទេសចរណ៍
- ធ្វើប្រាក់ប្រថាប់ត្រាបញ្ជាក់លើលិខិតជាផ្លូវការ

CENTURY TRAVEL & SERVICE CENTER
**904 South 8th Street. Philadelphia, PA 19147**
**Tel : 215-625-2889; Cell : 267-934-9888**

ខ្មែរជួសជុលរថយន្ត
**KHMER AUTO REPAIR**
**CAR INSPECTION, DIAGNOTIC & REPAIR**

**ត្រួតពិនិត្យរថយន្តបញ្ជូរដ្ឋ**
- ឆែករកកន្លែងខូចខាត និងជួសជុល
- យើងធ្វើហ្វ្រាំង ឬប្រេក
- ត្រួតពិនិត្យធ្វើម៉ាស៊ីនឱ្យស្រួលឡើងវិញ
- បញ្ចេះឡានអាល់ទេណាទ័រ
- ប្តូមចរន្តទឹកវេឌីណាទ័រ
- សេវាត្រង់បីស្បុង
- មើលតម្រងទ្រនាប់ និងពីញ្ញូង

Brake Service
Turn up electronic
Starters Alternators
Radiators water pumps
Transmission Service
Struts checked & serviced
CV Joints Rack & Pinion
Shocks checked & Replace

115 West. Tabor Rd, Philadelphia, PA 19120
Tel: (215) 455-1422/Pat: 215-939-5634

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ
# រ.ជ.រ.ប.ខ លោកតា សឺន សាន




**ដោយ : ម៉ម ឃីន**



បរិសុទ្ធស្មោះត្រង់ចំពោះជាតិមាតុភូមិ រហូតបានរំដោះ និងសង្គ្រោះរូបជីវិតវិញហើយ ។ ចំណែកលោកប្រធានរណសិរ្សជាតិ រជរបខ លោកអគ្គមេបញ្ជាការលោកនាយកអគ្គសេនាធិការលោកមេទ័ពសំខាន់ៗកងកម្លាំងទ័ពជាតិកជរបខលោកមេដឹកនាំគ្រប់ស្ថាប័នគ្រប់គ្រងផ្នែករដ្ឋបាលប្រជាពលរដ្ឋទាំងអស់គ្នាបានត្រៀមខ្លួនជាស្រេចថា នឹងបានចូលទៅរួមចិត្តរួមគំនិតរួមកាយរួមដៃគ្នា ជួយប្រទេស និងប្រជាជាតិជាមួយគ្នា ។

អង្គការសហប្រជាជាតិ ក្រោយពីបានចុះកិច្ចសន្យាក្នុងសន្និសញ្ញាអន្តរជាតិ រួចហើយក៏បានសម្រេចផ្តល់ថវិកាចំនួនពីពាន់លានដុល្លារ (ពីរកោដ)ដើម្បីចំណាយក្នុងការរៀបចំការបោះឆ្នោតសកល ជ្រើសរើសមេដឹកនាំថ្មីមួយដែលប្រជាពលរដ្ឋខ្មែរពេញចិត្តទៅតាមគោលការណ៍លទ្ធិប្រជាធិបតេយ្យ សេរីពហុបក្ស ក៏បានអនុញ្ញាតិឱ្យអង្គការសហប្រជាជាតិ បញ្ជូនបុគ្គលិកសំខាន់ៗនិងកងទ័ពរក្សាការពារសន្តិភាពល្មមគ្រប់គ្រាន់ និងមានអាវុធយុទ្ធភណ្ឌគ្រប់ប្រភេទជាអង្គភាពជើងគោក ជើងទឹក និងជើងអាកាសព្រមទាំងនគរបាលសម្រាប់ជួយរៀបចំការបោះឆ្នោតឱ្យមានរបៀបរៀបរយមានសន្តិសុខល្អនៅពាសពេញលើផ្ទៃប្រទេសខ្មែរទាំងមូល ។

ចំណែកមេដឹកនាំសំខាន់ៗនៃភាគីដែលស្ថិតនៅក្រៅប្រទេសត្រូវធ្វើដំណើរចូលមកកាន់ប្រទេសវិញ ដើម្បីដំណើរការនូវការបង្រួបបង្រួមជាតិនេះទៅតាមសន្ធិសញ្ញាបញ្ចប់សង្គ្រាម ។

**តទៅលេខក្រោយ**


## ផ្ទះជួល

**Philadelphia:** ផ្ទះមានបន្ទប់ដេក ២ សំរាប់ជួល តម្លៃ $600/១ខែ នៅតំបន់ Cottman/Castor (68xx Lynord) -តំបន់ដែលសម្បូរនីរថយន្តក្រុង និងហាងលក់ទំនិញ -អាចមកនៅបានភ្លាម

សូមទូរស័ព្ទទៅ : **215-514-2448**

## លក់ផ្ទះ DUPLEX នៅ LOGAN

**ហ្វីឡាដែលហ្វៀខាង ជើង:** លក់ផ្ទះមាន 2 appartments សម្រាប់គ្រួសារ ២-១ Unit មានបីបន្ទប់ដេក មានបន្ទប់ទទួលភ្ញៀវ បន្ទប់ទឹកចង្ក្រានបាយ ។ ស្ថិតនៅលើផ្លូវ Ruscom ក្បែរផ្លូវធំ Broad Street ដែលសម្បូរណ៍រថយន្តក្រុង និងមេត្រូ -អាចជួល បាន $1,400/ខែ ។ ម្ចាស់ផ្ទះប្រញាប់ទៅរស់នៅរដ្ឋផ្សេង ។ សូមទាក់ទងតាមទូរស័ព្ទ Zina



**(267) 421-4340**

## ក្រុមហ៊ុនធានារ៉ាប់រងដែលបានបំរើសង្គម២២ឆ្នាំហើយ
## CONWAY INSURANCE



For over 23 years, **Conway Insurance Agency** has been your community's one-stop provider of quality insurance services in New England.
We are a **full-service agency** offering:

- Personal Insurance
  - Autos
  - Homes
  - Apartments
  - Jewelry
  - Fine arts
  - Collectibles
- Business Insurance
  - Property
  - Liability
  - Professional Liability
  - Worker's compensation
  - Bonds
  - Auto, Garage keepers.
  - Disability and life insurance (individual and group products)
  - Other specialty programs

ក្រុមហ៊ុនធានារ៉ាប់រង ផ្ទះ រថយន្ត មុខរបរ និងសុខភាព

**យើងនិយាយភាសាខ្មែរ**




P.O. Box 1744
77 E. Merrimack Street
Lowell, MA 01853
Tel: 978-454-5054
Fax: 978-453-2480

**www.ConwayInsurance.com**

សូមសួររក Philip Muth, Philip@ConwayInsurance.com

## East Coast Center
for Plastic & Laser Surgery

Mai Ngoc Tran, M.S., Skin Care Specialist
Joseph A. Russo, M.D. F.A.C.S
Plastic & Reconstructive Surgeon
www.eastcoastsurgery.com


Skin Care Products


Tummy Tuck


Breast Lift


Beast Enlargement


Nose Surgery


Eyelid Surgery


Face Lift


Dermabrasion

**ហាងកែសម្ផស្សយើងខ្ញុំមានទទួលកែសម្ផស្ស បុរស_ស្ត្រី ដែលមាន អាការៈដូចជា: ខ្លាញ់ក្បាលពោះ ពង្រីកសុដន់ឱ្យធំ កែខ្ទង់ច្រមុះ កែត្របកភ្នែក កែមុខស្រស់ស្អាត...។ល។ និង។ល។ និងមានលក់ឧបករណ៍កែសម្ផស្សផ្សេងៗជាច្រើនទៀត**

381 West Broadway South Boston, MA 02127
**(617) 464 - 0001**

# ANGKOR AUTO SERVICE, INC.

## ហាងជួសជុលរថយន្ត "អង្គរ"

Free Estimate

Auto Body and Maintenance

BODY WORKS

Auto glass and windshields

Auto Frame Straightening and Painting

មានបទពិសោធន៍២០ឆ្នាំ ជាជាងរថយន្តមានសញ្ញាប័ត្រវាយតម្លៃការងារដោយឥតយកថ្លៃ ហើយយើងជួយសន្សំប្រាក់តម្លៃបន្ថយរបស់អិនស៊ូរិនបានផង យើងផ្តល់សេវាគ្រប់យ៉ាង :

ENGINE AND TRANSIMISSION SERVICES

State Inspection
Check Engine Light Diagnostic
Timing Belt Services
Complete Tune Up:
-Brake -Muffler -Struts
-Water Pump -A/C
-Bearing Services

From the moment you get into car accident, we will take care of you from towing to calling your insurance, and to get a rental car for you. With Angkor Auto, you can be worried free.

4835 N. 16th Street. Philadelphia, PA 19141
Tel : (215) 455-7810 / Ricky : (215) 485-1425

# PK Property, Inc.

## ក្រុមហ៊ុនអចលនវត្ថុ លក់ ជួល គ្រប់ប្រភេទ

Agent: Roeut Chak

ភីខេ ប្រភឺធី (215) 635-5100
Roeut Chak- (267)872-3516
409 West Cheltenham Avenue
Melrose Park, PA 19027

**សម្រាប់បើកភោជនីយដ្ឋានខ្មែរ**

- 5706 N. 5th Street, Philadelphia PA 19120

ពីដើមជាភោជនីយដ្ឋាន ឥឡូវបិទ២000sqft បន្ទប់ដេកបី ជាន់ទី២ជា Apt គ្រឿងបរិក្ខាទាំងអស់នៅក្នុងផ្ទះឈ្នួល២000/ខែ

5734 N.2nd Street, Philadelphia, PA 19120
២៥00 sqftពីដើមជាភោជនីយដ្ឋាន មានកន្លែងចតឡាន៧៥- ឈ្នួល ២១00/ខែ

**កន្លែងភ្ញក់បៀរ BEER DELI**

- $16000/wk, Phila, Asking $99,000w/ Real Estate
- $13000wk, Phila., Asking $79,000w/ Real Estate
- $9000/wk, Asking $320.000
- $13,500/wk Asking $42000

**កន្លែងបោកគក់ដាក់កាត Co. Laundry**

- 100 Machines, 4500 sqft Asking $170,000
- $4500/wk Asking $200000
- 500/wk Bucks County; Asking $350,000

**កន្លែងចែកចាយបៀរ Beer Distributor**

- $1.3 Mil/yr, Bucks County, $250000 yearly income, Asking $1,150,000
- $75000/yr Philadelphia Asking $790,000 with RE
- 11,000,000 Philadelphia Asking $430,000

**សាឡងធ្វើក្រចក Nail Salon**

- $18000/wk, Montgomery County, Asking $380,000
- $15000/wk South Jersey Asking $370,000

**សូមចូលទៅវេបសាយ**

www.pkpropertyinc.com to check more listings and office information.


# ជោគជតារាសីទាំង 12 ប្រចាំឆ្នាំហាង

ជោគជតាប្រចាំសប្តាហ៍

**ឆ្នាំជូត**

លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

**ឆ្នាំឆ្លូវ**

នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិនិងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើ តែហាមកុំជួញដូរផ្លូវឆ្ងាញប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

**ឆ្នាំខាល**

ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

**ឆ្នាំថោះ**

រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះសូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានៈចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

**ឆ្នាំរោង**

លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមូលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

**ឆ្នាំម្សាញ់**

រាល់ការស្អុតស្អាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែម ទើបជាការប្រសើរ ៕

**ឆ្នាំមមី**

លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕

**ឆ្នាំមមែ**

រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗនាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

**ឆ្នាំវក**

រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះ សុទ្ធតែផ្តល់នូវអត្ថប្រយោជន៍គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នាបើនៅឆ្ងាយ ៕

**ឆ្នាំរកា**

អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្តីគួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

**ឆ្នាំច**

លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

**ឆ្នាំកុរ**

រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នាជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នក នោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហា គូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕



# មានមធ្យោបាយប្រសើរមួយ ។

អ្នកមិនគួរចាំបាច់ប្រឹងហួសហេតុពេកដើម្បីមានសុខភាពល្អទេ ។
នោះគឺជាមូលហេតុដែលផែនការ CHIP និង Medicaid របស់យើងផ្ដល់ជូនៈ

- សមាជិកភាព Y និង Fitness Center
- Weight Watchers®

*តម្លៃរហូតដល់ត្រឹមតែ $1,100 ក្នុងមួយឆ្នាំ!*

HEALTH PARTNERS
1-800-553-0784
www.healthpart.com



Pennsylvania's Children's Health Insurance Program
www.chipcoverspakids.com

KidzPARTNERS
HEALTH PARTNERS
1-888-888-1211
www.kidzpartners.com

# ផ្សារអាតាឡង់ទិក

Atlantic Market
135 main St, Danbury, CT 06810
**203-830-3068**




ផ្សារនេះមានម្ចាស់ឈ្មោះ **ដាន់ ស៊ីន** បើកលក់ដូរតាំងពី១០ឆ្នាំមកហើយ ជាពិសេសយើងជាអ្នកលក់ត្រីស្រស់ៗនៅក្នុងក្រុង ។ បន្ថែមពីលើលក់ត្រីស្រស់ យើងមានលក់បន្លែសម្រាប់ម្ហូបអាស៊ី ។

**យើងទទួលយក :** American Express -លុយសុទ្ធ -Debit card -Master Card -Visa

**បើកទ្វារ :** ថ្ងៃច័ន្ទ ម៉ោង ៩:៣០ព្រឹក ដល់៧ល្ងាច/ ថ្ងៃអង្គារ៍ ដល់ថ្ងៃសៅរ៍ ៩:៣០ដល់៨ល្ងាច/ ថ្ងៃអាទិត្យ ៩:៣០-៧:០០




**ទីផ្លាចតរថយន្តឥតគិតថ្លៃ**



តមកពីទំព័រទី ១៤

## អត្ថន័យមេរុ និងជំនឿថ្វាយព្រះភ្លើង...

ចង់បានសន្តិភាពព្រះអង្គបានទតឃើញវែងឆ្ងាយពីពិភពលោកមួយដែលប្រកួតប្រជែង និងហែកហួរគ្នាមិនចេះឈប់ឈរ ។ ព្រះអង្គបានដាក់ប្រទេសជាប្រទេសអព្យាក្រិតមិនចូលបក្សសម្ព័ន្ធ ។ ព្រះអង្គដាក់នយោបាយប្រទេសទំនាក់ទំនងចំណងមិត្តភាពគ្រប់និន្នាការជាមួយលទ្ធិនយោបាយលើលោក ។ ឯក្នុងប្រទេសវិញព្រះអង្គដើរតួនាទីយ៉ាងសំខាន់ក្នុងការបង្រួបបង្រួមជាតិដែលការបង្រួបបង្រួមនេះព្រះអង្គត្រូវបានប្រជារាស្ត្រឱ្យងារជាបិតាឯករាជជាតិបិតាបង្រួបបង្រួមជាតិ ។ ប៉ុន្តែទោះបីយ៉ាងនេះក៏ដោយប្រទេសកម្ពុជារបស់ព្រះអង្គត្រូវបានពួកប្រទេសមានមហិច្ឆតាអាក្រក់នានាមិនឱ្យព្រះអង្គ និងប្រទេសព្រះអង្គ និងប្រជារាស្ត្ររបស់ព្រះអង្គបានសុខឡើយ ។ ពួកគេបានរុញខ្មែរឱ្យបែកបាក់ និងកម្ចាត់ព្រះអង្គដែលពួកគេគ្រប់គ្នាឱ្យឈ្មោះថា ប្រទេសកម្ពុជារបស់ព្រះអង្គកើតសង្គ្រាមស៊ីវិល ។ ប៉ុន្តែសម្រាប់ព្រះអង្គវិញ មិនបានហៅសង្គ្រាមនោះជាសង្គ្រាមស៊ីវិលទេ ព្រះអង្គបានហៅសង្គ្រាមនៅកម្ពុជាកន្លងមកថា "សង្គ្រាមដែលបង្កឡើងដោយពួកបរទេស(Six)!"។ ប៉ុន្តែទោះបីមានការកម្ចាត់ព្រះអង្គដោយខុសច្បាប់ហើយព្រះអង្គគ្មានអំណាចដូចពួកគេក៏ដោយ ក៏ស្ទើរគ្រប់របបដែលប្រឆាំងព្រះអង្គតែងតែមិនអាចយកឈ្នះព្រះអង្គដោយ


ពិធីដង្ហែព្រះបរមសព

ពួកគេតែងតែត្រូវការព្រះអង្គ និងកេងចំណេញពីកិត្តិនាមរបស់ព្រះអង្គដើម្បីពង្រឹងអំណាចនយោបាយរបស់ពួកគេ ។ ដូចជារបបរដ្ឋប្រហារលន់នល់ដែលគាំទ្រដោយអាមេរិកក្រោយពីផ្តួលរបបព្រះអង្គដោយខុសច្បាប់ក៏របបនេះមិនអាចស្ថិតស្ថេរបានយូរដែរ ។ ពួកចលនាកុម្មុយនីស្តខ្មែរក្រហមដែលឈ្នះរបបរដ្ឋប្រហារ លន់ នល់ ពួកគេក៏បានពឹងពាក់ព្រះកិត្តិនាមព្រះអង្គហើយក៏យកជ័យជំនះលើរបប លន់ នល់ បានជោគជ័យដែរ ។ ប៉ុន្តែរបបនេះក៏ចាប់ព្រះអង្គឃុំឃាំងហើយរបបនេះគ្មានព្រះអង្គក៏ទទួលបរាជ័យ ។ រីឯរបបនៃចលនាតស៊ូត្រីភាគី ក៏ត្រូវការពឹងនូវព្រះកិត្តិនាមព្រះអង្គហើយ ព្រះអង្គក៏ប្រើប្រាស់នូវទេពកោសល្យនយោបាយដ៏ប៉ិនប្រសព្វទាមទារឱ្យវៀតណាមដកទ័ពចេញកម្ពុជា ហើយ អ.ស.ប ទទួលស្គាល់កម្ពុជា ។ ការបង្រួបបង្រួមថ្មីមួយក៏បានសម្រេចឡើងវិញ និងនាំមកនូវសន្តិភាព ។ បន្ទាប់មកព្រះអង្គក៏យាងវិលត្រឡប់មកបង្កើតរបបរាជានិយមលើកទី២ ហើយព្រះអង្គក៏ឡើងគ្រងរាជ្យសម្បត្តិផងដែរ ដែលប្រទេសលើពិភពលោកកម្រមាន ។ ហើយមុនព្រះអង្គយាងចូលទិវង្គត់ព្រះអង្គក៏បានរៀបចំឱ្យព្រះរាជបុត្រព្រះអង្គស្នងរាជជាមុនចៀសវាងអត់ពីព្រះអង្គទៅកម្ពុជានឹងជួបវិបត្តិរាជបល្ល័ង្ក ៕

NECC
New England Community Care
www.newenglandcommunitycare.com
មជ្ឈមណ្ឌល ញូវ អ៊ីងគ្លែន
ថែទាំសុខភាព ប្រចាំថ្ងៃ សម្រាប់មនុស្សពេញវ័យ
81 Bridge Street Lowell, MA 01852
www.newenglandcommunitycare.com
Speaks Khmer: Senghap Rouen, 978-944-4182
Lynne Brown-Zounes, Program Director, 978-441-0000

• BEER
• WINE
• COFFEE
SOC TRANG
VIETNAMESE RESTAURANT
413
736-9999
113 VERMONT STREET. SPRINGFIELD, MA 01108
GRAND OPENING
យើងមានសេចក្តីរីករាយ និងសូមអញ្ជើញលោកអ្នកព្រមទាំងគ្រួសារ អញ្ជើញមកពិសារម្ហូបពិសេស ចំអិនដោយចុងភៅដ៏ជំនាញរបស់យើង និងលំហែរកាយនៅសាលពិសារភោជនាហារ ដែលរៀបចំយ៉ាងប្រណិតសំរាប់ទទួលលោកអ្នក ។
ACCEPTING NEW PARTY BOOKINGS,
ASSOCIATION MEETINGS, BIRTHDAYS ETC
200 PEOPLE CAPACITY.
ម្ហូបពិសេស
▸ មានហ្វើ -មានគុយទាវ -មានបាយស្រូប មានគ្រឿងក្លែម
▸ មានបំរើភេសជ្ជៈស្រាបៀ និងភេសជ្ជៈមានសុរាតិច
ទទួលកក់ពិធីជប់លៀង ឬ
ធ្វើការប្រជុំរបស់សមាគម ឬ
ធ្វើបុណ្យខួបកំណើត...
(ឱ្យខ្ចីសាលមិនគិតថ្លៃ _យកតែថ្លៃបំរើម្ហូប)
Open Monday-Sunday
9 a.m. – 9 p.m.
Closed Thursdays
SPECIALS:
*PHO * NOODLES *RICE COMBO
*SERVE BEER, LIGHT ALCOHOL DRINKS.



"She tells me all the time
I'm so happy.
She loves being home with us."



CAREGIVER™ HOMES

Caregiver Homes™ helps elders and individuals with disabilities enjoy a high quality of life at home

- **Pays & trains** a full-time, live-in caregiver
- Provides **professional support** from a dedicated nurse and care manager
- Helps you find & **access all necessary services**

For more information, call **866.797.2333** or visit our website.
**WWW.CAREGIVERHOMES.COM**

មជ្ឈមណ្ឌលសុខភាពពេលថ្ងៃសម្រាប់ជនពេញវ័យ

**HOME AWAY FROM HOME ADULT DAY HEALTH CENTER**



នៅពេលលោកអ្នក ឬមនុស្សសំណព្វចិត្តរបស់លោកអ្នកត្រូវការគេជួយនៅពេលថ្ងៃ មជ្ឈមណ្ឌលយើងមានសេវាកម្មអ្នកថែទាំមានវិជ្ជាជីវៈ អាចនិយាយភាសាអង់គ្លេស ខ្មែរ ចិន និងស្ប៉ានីសបាន ។



**យើងអាចផ្តល់ជូនសេវា ដូចតទៅ :**

- ថែទាំ សំអាត ធ្វើការសង្គមកិច្ចជូន និងព្យាបាលរាងកាយ
- ដឹកជញ្ជូនទៅមកពីផ្ទះទៅមជ្ឈមណ្ឌល និងទៅជួបពេទ្យ
- នាំចេញទៅភោជនីយដ្ឋានខ្មែរ –ទៅទិញឥវ៉ាន់ផ្សេងៗ ឬទៅមើលកន្លែងវប្បធម៌នានា
- មានការស្តាប់ និងលេងភ្លេង មើលកុន កំសាន្តល្បែង ថ្នាក់សិក្សា និងការហាត់ប្រាណរាល់ថ្ងៃ
- បើកទ្វារពីថ្ងៃច័ន្ទដល់ថ្ងៃសៅរ៍ ពីម៉ោង៧ព្រឹកដល់៤ល្ងាច ឬក៏ប្តូរម៉ោងក៏បានតាមតម្រូវការ

**យើងទទួល អ៊ិនស្វ៊ិន ស្ទើរគ្រប់មុខ**

- Mass Health • Evercare • Navicare • Senior Whole Health • Elder Services of the Merrimack Valley

## Our Services and Programs

- Nursing, social work and physical therapy
- Transportations
- Breakfast, lunch and snacks
- Outings to Cambodian restaurants, shopping, and cultural events
- Entertainments, spiritual classes and exercise daily

សូមទាក់ទងទៅ ខារិន បន ក្ការីហ្កាន់ (Karen Bond Garrigan) 978-453 Home (978-453-4663) ដើម្បីនាំទៅមើលមជ្ឈមណ្ឌល
Conveniently located at 150 Industrial Avenue East in Lowell, right off the Lowell Connector
Open Monday-Friday 7-4 and Saturday 7:30-2:00 PM
www.homeawayfromhomeADHC.com

# Collegiate Charter School of Lowell

សាលារៀនអន្តរជាតិ និងបើកថ្មី បង្រៀន_សម្រាប់ទៅមហាវិទ្យាល័ ផ្តើមបើក
នៅខែកញ្ញា ២០១៣ នេះហើយ ហើយផ្តល់សេវាឲ្យសិស្សតាំងពីថ្នាក់មត្តេយ្យដល់ថ្នាក់ទី៥

## អនុវិទ្យាល័យ ឆាទ័រ នៃក្រុងឡូវែល

ផ្តើមចុះឈ្មោះហើយ !



- កម្មវិធីត្រៀមទៅវិទ្យាល័យ
- មានឯកសណ្ឋានសិស្ស
- បង្រៀនចរិយាសម្បត្តិ
- សង្កត់លើគណិតវិទ្យា និងអង់គ្លេសខ្លាំង
- ពេលរៀនច្រើនក្នុង១ថ្ងៃ
- ក្រមចរិយាមានច្បាស់លាស់
- មានក្តីសង្ឃឹមខ្ពស់
- សាស្ត្រាចារ្យមានសញ្ញាប័ត្រខ្ពស់
- ការចូលរួមរបស់ឪពុកម្តាយ
- កម្មវិធីកំសាន្តក្រៅយ៉ាងសប្បាយ
- កម្មវិធីមុននឹងក្រោយម៉ោងរៀន
- កន្លែងថ្មីស្អាត និងសុវត្ថិភាព
- ពង្រីកដល់សាលាដែលមានថ្នាក់កំរិត១២
- សិក្សាឥតយកតម្លៃជាសាធារណៈ




**ការិយាល័យចុះឈ្មោះ**
1857 Middlesex Street, Lowell, MA 01851
Phone: (978) 458-1399
E-mail: LCCS@sabis.net
www.LCCS.SABIS.net

*Member of the SABIS® School Network*